KhmerPost USA

Advertising: PA/NJ/NY: (267) 253-3947
CT: (860) 461-3687 MA/RI: (978) 656-8141/(781) 244-0522

មាតិការឿង

Vol 06 Issue 117 Nov. 9th - 22 nd. 2012

ទំព័រ



32 Wamesit St., Lowell, MA 01852. Phone-Fax (978) 656 8141 www.khmerpost.us

# ទស្សនៈនយោបាយ

## ឥទ្ធិពលនៅកម្ពុជា បន្ទាប់រជ្ជកាល សីហនុ





ដោយ : ពិន សំខុន

●●●សម្តេចនរោត្តម សីហនុ បាន បញ្ចប់រជ្ជកាលរបស់ព្រះអង្គយ៉ាងត្រចះត្រចង់ក្នុងអំណាចដ៏ខ្ពង់ខ្ពស់ និងឥទ្ធិពលដ៏ធ្ងន់ធ្ងរលើនយោបាយកម្ពុជា និងទំនាក់ទំនងអន្តរជាតិ ។ ថ្វីត្បិតតែការ តទៅទំព័រទី ០៩

# លោក បារ៉ាក់ អូបាម៉ា ឈ្នះម្តងទៀត



ខ្មែរផុស ស.រ.អា

●●●ព្រឹត្តិការណ៍ប្រវត្តិសាស្ត្របានកើតឡើងម្តងទៀត ដោយប្រធានាធិបតីអាមេរិកាំងស្បែកខ្មៅ បារ៉ាក់ អូបាម៉ា បានជាប់ឆ្នោតសម្រាប់អាណត្តិទី២ ទៅមុខជាថ្មី កាលពីថ្ងៃទី៦ វិច្ឆិកា ឆ្នាំ២០១២ ។ លោកបានឈ្នះលើបេក្ខជនគណបក្សសាធារណរដ្ឋ មីត រ៉មនី ដោយបានសម្លេងប្រតិភូ៣០៣ទល់នឹង មីត រ៉មនី ដោយបានសម្លេងបានតែ២០៦ រីឯសម្លេងប្រជាប្រិយវិញ លោក បារ៉ាក់ អូបាម៉ា បាន ៥០%ទល់នឹង៤៨% ។

ក្នុងឱកាសដ៏លំបាកពលរដ្ឋអាមេរិកាំងបានបញ្ចេញសម្លេងគាំទ្រឱ្យលោក បារ៉ាក់ អូបាម៉ា នៅបន្តអាណត្តិប្រធានាធិបតីជាមួយលោក ជោ បាយដិន អនុប្រធានប្រធានាធិបតី ។ អ្នកវិភាគព្រឹត្តិការណ៍បោះឆ្នោតប្រធានាធិបតីនេះបានកត់សម្គាល់ថា ការស្ទង់មតិមុនបោះឆ្នោត បានឱ្យសញ្ញាដល់ មីត រ៉មនី ថានឹងចាញ់ឆ្នោត តែ មីត មិនបានជឿលើការស្ទង់មតនេះប៉ុន្មានទេ ។ ការបោះឆ្នោតលើកនេះបានប្រមូលមនុស្សឱ្យចេញទៅបោះឆ្នោតបានច្រើន -ជនស្បែកខ្មៅ យុវជននឹងស្ត្រីភេទ តទៅទំព័រទី ១៦



# តើទិវាមាតាមានន័យអ្វីសម្រាប់យើង

**តពីលេខមុន**

●●●ដើម្បីឈាមខ្មែរឈប់ហូរ,ខ្មែរចេះស្រឡាញ់គ្នា,មានព្រះរាជាប្រកបដោយទសពិតរាជធម៌ ឬមានអ្នកដឹកនាំប្រកបដោយបុណ្យបារមីនឹងមានសិលធម៌ចេញមកកសាងនគរឱ្យបានរុងរឿងថ្កើនថ្កានដូចសម័យអង្គរដើមវិញ ។ សុំឱ្យកូនបានជួបសម័យកាលដ៏សប្បាយរីករាយសុខដុំរមនានោះកុំខាន ហើយសុំឱ្យកិត្តិយសសម័យអង្គរនៃទឹកដីពិសិទ្ធនឹងពោរពេញដោយអាថិកំបាំងនេះរលាស់ខ្លួនចេញរួចវិញពីអន្លង់ទុក្ខសោកញាំញីរាប់រយឆ្នាំមក ហើយនេះបាន ហើយសូមឱ្យរស្មីនៃបូរីអង្គររះឡើងវិញចែងចាំងឆព្វណ្ណរង្សីពេញទ្វីបលោកាសារជាថ្មី កុំបីខានដូចជាពុទ្ធទំនាយទាយទុកមកស្រាប់"។

សុបិនជាទីរាប់អាន កាលនោះម៉ែអ៊ុំមិនបានឃើញព្រៃនគររលំភ្នំពេញរលាយទេ តែគាត់បញ្ជាក់ថា តែមានពីរខាងដើមទី៣ ត្រូវតែមានតែទី៣មានហើយទី៤ចាំតែកើតឡើង មិនខានជាការពិតប្រាក ។ សម័យនេះយើងឃើញព្រៃនគររលំ ហើយ (វារលំទៅជាក្រុងហូជីមិញវិញ) ឯភ្នំពេញយើងក៏ឃើញរលាយដែរ គឺរលាយសូន្យឈឹងកាលពីសម័យ ប៉ុល ពត ហេតុការណ៍បន្ទាប់មកត្រូវមកដល់គឺបាងកកខ្ចាត់ខ្ចាយ ។ ទី១ទី២មានហើយបាងកកក្រុងទេពមហានគរអើយ ! អ្នកត្រូវតែខ្ចាត់ខ្ចាយជៀសមិនផុតឡើយ "ព្រោះនេះជាទំនាយ"។ និយាយអញ្ចឹងអ៊ុំគ្មានមហិច្ឆតាចង់ឱ្យក្រុងបាងកករលាយទេ ព្រោះយើងធ្លាប់ជួបប្រទះហើយ ស្រុកសង្គ្រាមវេទនាណាស់ហិនហោច ខ្ទេចខ្ទាំ, ព្រាត់ប្រាស់ និរាស, កូនចៅបែកបាក់ម្តាយឪពុកតាយាយ, យើងមិនចង់ឱ្យគេមានឈឺចាប់ទុក្ខសោកវេទនាដូចយើងទៀតទេ, តែយើងចង់ឃើញចំណុចទី៤ គឺ"ទៅសប្បាយឯអង្គរវត្ត", ដើម្បីបានទៅសប្បាយ ឯអង្គរវត្តវាត្រូវតែបាងកកខ្ចាត់ខ្ចាយសិន។ តើបាងកកត្រូវខ្ចាត់ខ្ចាយនៅពេលណា? បើតាមមើលទៅមិនយូរទេ ស្ថានការណ៍មានសភាពទុំជោរណាស់ហើយ ពួកសៀមនេះក៏ប្រព្រឹត្តអំពើបាបច្រើនពេកណាស់ទៅហើយ ក្នុងប៉ុន្មានសតវត្សនេះ, តាំងពីកុលសម្ព័ន្ធតូចមួយបានចក្រពត្រ្តាធិរាជនៃមហានគរប្រទានឱ្យឯករាជ្យ ហើយ ទុកជាបុត្រនៃមហាអំណាចនេះ ដូនតាសៀមមិនគិតដឹងគុណតបស្នងនូវគុណបំណាច់ដែលខ្លួនបានទទួលបែរជាមានគំនិតក្រពើដោយឃើញមហាប្រទេសនេះ មានវិបត្តិធ្លាក់ចុះទន់ខ្សោយក៏កើតគំនិតក្បត់វាយប្រហារដណ្តើមយកទឹកដីខេត្តខ័ណ្ឌសីម៉ាម្តងបន្តិចៗ វាយដំធ្វើបាបកាប់សម្លាប់ចុះកែងជើងដាក់ច្រវ៉ាក់រាស្ត្រប្រជានៃប្រទេសអ្នកមានគុណយកទៅធ្វើជាទាសាទាស,រឹបអូសយកជាងម្តៃខេត្តក្រុងខ្មែរទៅធ្វើជាសម្បត្តិខ្លួន, មិនទាន់ស្កប់ចិត្តលោភគ្មានបាត់របស់ខ្លួន នៅតែខំរកឱកាសដែលខ្មែរបែកបាក់គ្នានឹងរុកគួនស្រែកប្រកាសចង់បាន ថាដីបាត់ដំបង, សៀមរាប, ប្រាសាទព្រះវិហារជារបស់ខ្លួនទៀត ។ រឿងទុក្ខសោកដ៏ក្រៀមក្រំថ្មីៗនេះ ដែលមិនអាចឱ្យខ្មែរបំភ្លេចបាន គឺរឿងថៃធ្វើបាបអ្នកភៀសខ្លួនខ្មែរក្នុងវិបត្តិប៉ុលពតទៅជ្រកកោននៅដីថៃ ពួកតម្រួតថៃទាត់ធាក់វាយដំធ្វើបាបជាងសត្វធាតុទៅទៀត, មិនអស់ចិត្តពួកហន្សុងនេះថែមទាំងដេញបញ្ជូនជនភៀសខ្លួនខ្មែរអភ័ព្វទាំងនោះ ទម្លាក់ចំការម៉ុនតាមចម្រៀលភ្នំដងរែកស្លាប់ត្រៀបត្រាដោយគ្មានសោកស្តាយដល់បន្តិចសោះឡើយ! ឱ!ជាពុទ្ធសាសនិកជនដែរ ម៉េចក៏សាហាវយង់ឃ្នងអ្វីម្ល៉េះ? ។

សុបិនជាទីរាប់អាន, អ៊ុំរំលឹងរឿងនេះនឹងរឿងយួនកាប់សម្លាប់ខ្មែរយើងដោយគ្មានបំណងកកាយសើររើដុតកំដៅកំហឹងសងសឹកអ្វីឡើយ តែមានបំណងឱ្យខ្មែរគ្រប់រូបចងចាំទុកជាមេរៀន, កុំប្រហែសខ្លួនឱ្យសោះកុំឱ្យទុកខ្លួនជាកុក, ត្រូវខំប្រឹងធ្វើខ្លួនឱ្យទៅជាជង់ ដើម្បីគ្រាន់ការពារខ្លួនគ្រប់កាលៈទេសៈ, ហើយខំរៀនធម៌ឧបេក្ខានឹងអត់ធ្មត់ឱនទោសដល់សព្វសត្វទាំងឡាយជាមិត្ត ឬជាសត្រូវរបស់ខ្លួន ក៏ដោយពេលគ្នាមានទុក្ខ។ ត្រូវត្រៀមខ្លួនចាំផ្សាយមេត្តាភាវនាដល់គ្នាទាំងឡាយផង ព្រោះវិបត្តិអាវលឿងអាវក្រហមនៃគណបក្សថៃទាំងឡាយមុខតែរុញច្រានអាណាចក្រថៃទៅដល់បាងកកខ្ចាត់ខ្ចាយ ដូចពុទ្ធទំនាយទាយទុកមិនខាន ហើយក៏នាំគ្នាទៅសប្បាយឯអង្គរវត្តយ៉ាងប្រាកដ។

តែមានសង្គ្រាម, មានកលិយុគហើយមិនថាអ្នកបានប្រព្រឹត្តបាបកម្មក៏អត់ទេ,ពេលវឹកវរយ៉ាងនេះ អ្នកអត់កម្មក្តី,អ្នកមានកម្មក្តីត្រូវតែវេទនាសឹងគ្រប់គ្នាអញ្ចឹងយើងត្រៀមខ្លួនបញ្ជូនមេត្តាភាវនាដល់អ្នកទាំងនោះ ដោយឧបេក្ខាផងចុះ សូមឱ្យកម្មពៀរ, គំនុំគុំ គួន, ស្អប់ខ្ពើមសងសឹកទាំងឡាយអហោសិកម្មទៅកុំបីមានសេសសល់ឡើយហោង។

សុំទោសមិត្តអ្នកអានទាំងឡាយ ព្រមទាំងសុបិនជាទីរាប់អានដោយជក់តែចម្រៀងម្តាយអ៊ុំៗក៏ចាកចេញពីប្រធានបទ "ទិវាមាតា" យ៉ាងឆ្ងាយតែម្តង ព្រោះម្តាយជាអ្វីៗ **តទៅទំព័រទ ១៦**

# សុខភាព និងម្ហូបអាហារយើងបរិភោគ

## អ្នកឧបត្ថម្ភ







តពីលេខមុន

### Serve with

- 2 cups cooked brown rice
- ½ tablespoon cornstarch, dissolved in 2 table- spoons warm water
- 1 teaspoon sugar
- ½ cup water

#### Nutrition Notes

- Reduced sodium (less oyster sauce)
- Reduced saturated fat and cholesterol (skinless chicken breast instead of beef or pork)
- Increased fiber/reduced simple carbohydrate (brown rice instead of white rice)

#### កំណត់សំគាល់អាហារូបត្ថម្ភ

- បន្ថយជាតិខ្លាញ់ឆ្អែត (ប្រើខ្ទិះដូងតិច)
- បន្ថយជាតិស្ករ (ប្រើមេស្ករជំនួសស្ករធម្មតា)
- បន្ថយជាតិសូឌីយ៉ូម (ប្រើអំបិលតិច)
- រូបមន្តនេះនៅតែមានជាតិខ្លាញ់ឆ្អែតច្រើន ពីព្រោះតែប្រើខ្ទិះដូង ដូច្នោះគួរតែញ៉ាំវាយូរៗម្តងបានហើយ

- This recipe still has a lot of saturated fat because of the coconut milk, so it should be eaten only occasionally





## ចេកខ្ទិះ

### គ្រឿងផ្សំ

- ខ្ទិះដូងមានជាតិស្ករតិច ១ កែវរង្វាល់
- ទឹក ១.៥ កែវរង្វាល់
- ម្សៅសាគូ ២ ស្លាបព្រា
- ចេក ៣-៤ ផ្លែ (១.៥ ផោន)
- ស្ករ Splenda ១/២ កែវរង្វាល់ (ប្រអប់ពណ៌លឿង នៅកន្លែងលក់ស្ករ)
- អំបិល ១ ស្លាបព្រាប
- សណ្តែកបាយកិន ២ ស្លាបព្រា

រៀបចំសំរាប់មនុស្ស : ៤ នាក់

បរិមាណបរិភោគ : ចេកខ្ទិះ ១ ពែង

**ការរៀបចំ :**

លាយទឹកខ្ទិះដូងជាមួយទឹកនៅក្នុងកូនឆ្នាំង ហើយរម្ងាស់ឲ្យពុះ ។ ដាក់ម្សៅដំឡូងហើយកូរឲ្យបានសព្វ បន្ទាប់មកបំពុះ ហើយបន្ថយកំដៅឲ្យមកកម្រិតទាប ។ រម្ងាស់ទាល់តែម្សៅដំឡូងទន់ល្មម, ប្រហែលជា ១០ នាទី, ហើយកូរយូរៗម្តង ។

នៅពេលដែលគ្រឿងផ្សំកំពុងតែចំអិន, ចិតចេកជាចំណិតៗ ។ នៅពេលម្សៅដំឡូងទន់ហើយ, ដាក់ចេក, ជាតិស្ករម៉្យាង ដែលធ្វើឲ្យសុខភាពល្អ, និងអំបិល ។ ចំអិន ៥ នាទីថែមទៀត ។

ពេលចេកកំពុងតែចំអិន, លីងសណ្តែកបាយឲ្យបានឆ្អិន, លីងប្រហែលជា ២ នាទី ។

## Bananas in Coconut Milk

### Ingredients/ Shopping list

- 1 cup coconut milk
- 1½ cups water
- 2 tablespoons Asian tapioca pearls
- 3-4 bananas (about 1½ pounds)
- ½ cup Splenda (in a yellow box near the sugar at the store)
- ¼ teaspoon salt
- 2 tablespoons dried split mung beans

Serves 4

Serving size: about 1 cup

### Preparation

Boil the coconut milk and water in a medium pot. Stir in the tapioca, then bring back to boil, and reduce heat to low. Simmer until the tapioca is soft, about 10 minutes, stirring occasionally.

While the mixture is cooking, slice the bananas. When the tapioca is soft, add the bananas, Splenda, and salt. Cook for 3-5 minutes more.

While the bananas are cooking, roast the mung beans over medium high heat in a pan until light brown, about 2 minutes.

Sprinkle the mung beans on top to serve.

### Nutrition Notes

- Reduced saturated fat (less coconut milk; you can also use 1½ cups light coconut milk and 1 cup water instead of 1 cup coconut milk and 1½ cups water)
- Reduced sugar (Splenda instead of sugar)
- Reduced sodium (less salt)

## សាច់គោអាំងទឹកត្រីជូរអែម

### គ្រឿងផ្សំ

- សាច់ចន្លកខ្លាញ់តិច ១៨ អោនស៍
- សាឡាត់ ១ គុម្ព
- ត្រសក់ ២ ផ្លែចិតជាចំណិតៗ
- ជីរវ៉ាន់ស៊ុយ ១/២ កែវរង្វាល់

រៀបចំសំរាប់មនុស្ស: ៦ នាក់បរិភោគជាម្ហូបនាំមុខ

បរិមាណបរិភោគ : សាឡាត់ ៤-៥ សន្លឹក, សាច់គោ ៣ អោនស៍ និងបន្លែតាមការនិយមផ្ទាល់ខ្លួន

**ការរៀបចំ :**

អាំងសាច់គោទាល់តែឆ្អិនល្មម ។ នៅពេលដែលសាច់គោកំពុងតែអាំង, បក, លាង និងជូតសម្ងួតស្លឹកសាឡាត់ ។ ចិតសំបកត្រសក់ចេញ ហើយហាន់ឲ្យស្តើងៗ ។ លាងជីរវ៉ាន់ស៊ុយ ហើយកាត់ជាកំណាត់ៗ ប្រវែងប្រហែល ២ អ៊ិន្ឈ៍ ។ រៀបចំដាក់សាឡាត់ ត្រសក់ និងជីរវ៉ាន់ស៊ុយនៅក្នុងចាន ។ ពេលសាច់គោអាំងឆ្អិនហើយ យកវាចេញពីចង្ក្រានអាំង ហើយហាន់ឲ្យស្តើងៗ ។ រួចហើយរៀបដាក់នៅលើបន្លែដែលបានរៀបចំដាក់នៅក្នុងចានរួចហើយនោះ ។

**បរិភោគជាមួយ :** ទឹកត្រីជូរអែមដែលមានជាតិអំបិលតិច (បរិមាណបរិភោគក្នុង ១ ពេល គឺ ១ ស្លាបព្រា)

#### កំណត់សំគាល់អាហារូបត្ថម្ភ

- បន្ថយជាតិសូឌីយ៉ូម (ប្រើទឹកត្រីតិច)
- បន្ថយជាតិខ្លាញ់ឆ្អែត និងកូលេស្ទ័រោល ( ជ្រើសរើសសាច់ដែលមានខ្លាញ់តិច)



## Beef and Cucumber Salad

### Ingredients/ Shopping list

- 18 ounces lean boneless top sirloin or top round (select grade, all fat removed)
- 1 head leaf lettuce
- 2 cucumbers
- ½ cup cilantro

Serves 6 as an appetizer or side dish

Serving size: 4-5 leaves of lettuce, 3 ounces of beef, and vegetables as desired

### Preparation

Broil or grill the beef to medium rare. While the beef is cooking, separate, wash, and pat dry the lettuce leaves. Thinly slice the cucumbers. Wash the cilantro and cut into 2 inch sections. Arrange the lettuce, cucumbers, and cilantro on the serving plate.

When the beef is cooked, slice it thinly. Arrange the slices on the serving plate.

### Serve with

- 6 tablespoons reduced sodium lime sweet and sour fish sauce (page 43, 1 tablespoon per person)

### Nutrition Notes

- Reduced sodium (less fish sauce in the lime sweet and sour fish sauce)
- Reduced saturated fat and cholesterol (lean beef instead of high-fat cut)



## សម្លកកូរសាច់មាន់

### គ្រឿងផ្សំ

- អង្ករ ១/២ កែវរង្វាល់
- ស្លឹកគ្រៃ ២ គល់ហាន់ឲ្យល្អិតៗ
- ខ្ទឹមស ២ កំពឹស, និងខ្ទាយ ១/២ ដុំ
- ម្ទេង ១ ដុំប្រហែលប៉ុនមេដៃ
- ស្លឹកក្រូចសើច ៥ សន្លឹក
- ម្សៅរមៀត ១/២ស្លាបព្រា
- ខ្លាញ់ កាណូឡា មួយស្លាបព្រាកន្លះ
- ទឹកត្រី១ ស្លាបព្រា, និងស្ករ ១/២ ស្លាបព្រា
- អំបិល ១/២ ស្លាបព្រា
- សាច់ភ្លៅមាន់ ១ ផោន យកស្បែក និង ខ្លាញ់ចេញ
- ទឹក ៥ កែវរង្វាល់, និងគ្រាប់ស្រួយ ៣ ផ្លែ
- ត្រឡាច ១/២ ផោន ឬ ១/៤ ផ្លែ
- ល្ពៅ ១/២ ផោន ឬ ១/៤ ផ្លែ, និងល្ហុង ១/៤ ផ្លែ
- សណ្តែកកួរ ១/៤ ផោន

រៀបចំសំរាប់មនុស្ស : ៤ នាក់

បរិមាណបរិភោគ : សម្ល ២ ពែង បាយ ១ ពែង

**ការរៀបចំ :**

លីងអង្ករទាល់តែមានពណ៌ពងក្រឡាត ហើយកិនឲ្យបានហ្មត់ល្អ ។ កិនគ្រឿងផ្សំ (ស្លឹកគ្រៃ, ម្ទេង, ខ្ទឹមស, រមៀត, ខ្ទាយ, ស្លឹកក្រូចសើច) ជាមួយនឹងម៉ាស៊ីនកិន ឬបុកជាមួយត្បាល់បុកឲ្យខ្ទេចហ្មត់ល្អ ។ ហាន់សាច់មាន់ជាដុំប្រហែលកន្លះអ៊ិន្ឈ៍ ឬប៉ុនមេដៃ, រួមទាំងឆ្អឹងផង ប្រសិនបើចូលចិត្ត ។ ចិតសំបកត្រឡាចចេញ, លាងឲ្យ

តលេខក្រោយ

# កិច្ចសម្ភាសន៍ពិសេសរវាង"ខ្មែរផុស"ជាមួយលោក ជំទាវ មូរ សុខហួ

ដោយ : អ៊ុម លឿម

●●●ដូចការគ្រោងទុកទីបំផុតលោកជំទាវ មូរ សុខហួ និងលោក ប៉ុល ហំម ប្រតិភូដ៏សំខាន់ របស់គណបក្សសង្គ្រោះជាតិដែលទើបតែបានប្រសូត្រចេញពីគណបក្ស សម រង្ស៊ី និងគណបក្ស សិទ្ធិមនុស្សបានមកបំពេញទស្សនៈកិច្ច និងជួបសំណេះសំណាលជាមួយពលរដ្ឋខ្មែរ ព្រមទាំងអ្នកគាំទ្រនៅឯទីក្រុងហ្វីឡាដែលហ្វៀ នារាត្រីថ្ងៃ សៅរ៍ ខែវិច្ឆិកា កន្លងមកនេះ ដោយមានអ្នកចូលរួម ប្រមាណជាង១០០នាក់ ។ ក្រៅពីនោះគេក៏សង្កេតឃើញថ្នាក់ដឹកនាំសំខាន់ៗរបស់កណបក្សទាំងពីរក៏បានបង្ហាញនូវវត្តមានរបស់ខ្លួននាជំនួបនោះដែរ ។

ខាងក្រោមនេះជាកិច្ចសម្ភាសន៍រវាង"ខ្មែរផុស" ជាមួយលោកជំទាវ មូរ សុខហួ កាលពីថ្ងៃអាទិត្យ ទី៤ ខែវិច្ឆិកា ដែលមានខ្លឹមសារជាដើមអាទិ៍:

**អ៊ុមលឿម :** សូមជំរាបសួរលោកជំទាវបាន តើលោកជំទាវអាចជំរាបជូនបានទេ ថាតើបេសកកម្មរបស់លោកជំទាវផ្តោតលើកត្តាសំខាន់ៗអ្វីខ្លះ?

**មូរ សុខហួ :** ទស្សនៈកិច្ចរវាងខ្ញុំ និងលោក ប៉ុល ហំម គឺជាបេសកកម្មក្នុងការផ្តល់ព័ត៌មានអំពីគណបក្សសង្គ្រោះជាតិដល់បងប្អូនខ្មែរយើងនៅឯនាយសមុទ្រ ជាពិសេសនៅសហរដ្ឋអាមេរិក ។ ហើយការរួមគ្នារវាងគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស គឺជាព័ត៌មានដែលបងប្អូនខ្មែរយើងទទួលបាន ហើយពួកគាត់អបអរសាទរស្វាគមន៍ និងមានការគាំទ្រខ្លាំងបំផុត ។

**អ៊ុម លឿម :** ចំពោះសម្ព័ន្ធភាពដ៏ល្អរវាងគណបក្ស សម រង្ស៊ី ជាមួយគណបក្សសិទ្ធិមនុស្ស រហូតឈានដល់ការបង្កើតបានជាគណបក្សសង្គ្រោះជាតិ រហូតមកដល់ពេលនេះគណបក្សសង្គ្រោះជាតិមានការវិវឌ្ឍន៍ឈានដល់កំរិតណាហើយបាទ? ។


លោកជំទាវ មូរ សុខហួ

**មូរ សុខហួ :** យើងបានចុះឈ្មោះនៅក្រសួងមហាផ្ទៃជាផ្លូវការថា ជាគណបក្សពិតប្រាកដ ហើយលោកប្រធានសមរង្ស៊ីបានលាលែងពីគណបក្ស សម រង្ស៊ី ថ្ងៃទី២ ខែវិច្ឆិកា កន្លងមកនេះ និងក្លាយជាប្រធានគណបក្សសង្គ្រោះជាតិជាផ្លូវការហើយដែរ ។

ហើយបើតាមសេចក្តីរាយការណ៍សម្រេច និងសេចក្តីព្រមព្រៀងរវាងគណបក្សសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី នៅឯទីក្រុងម៉ានិលនាប្រទេស ហ្វីលីពីន កាលពីថ្ងៃទី១៧ ខែកក្កដា ក៏បានព្រមព្រៀងគ្នាដោយលោកប្រធាន កឹម សុខា និងក្លាយជាអនុប្រធានគណបក្សសង្គ្រោះជាតិ ។ យើងបានធ្វើដំណើរយ៉ាងលឿនដោយក្នុងនាមយើងជាតំណាងរាស្ត្រនៃគណកបក្សទាំងពីរយើងបានចុះតាមមូលដ្ឋានគ្រប់ខេត្តក្រុង ដើម្បីពន្យល់ពួកគាត់អំពីជម្រើសថ្មីមួយ និងពន្យល់ពួកគាត់ថា ហេតុអ្វីបានជាយើងដាក់ឈ្មោះគណបក្សសង្គ្រោះជាតិ? ។ ក្រៅពីនោះយើងក៏បានលើកផ្លាកសញ្ញាគណបក្សនៅតាមភូមិ ឃុំ មួយចំនួន និងបង្កើតឱ្យមានកម្មវិធីវិទ្យុមួយឈ្មោះថា កម្មវិធី"សង្គ្រោះជាតិ"ដោយក្នុងមួយថ្ងៃផ្សព្វផ្សាយបួនម៉ោង ។ ដោយហេតុនេះហើយ ទើបយើងមកស្វែងរកជំនួយពីបងប្អូនខ្មែរនៅក្រៅប្រទេស ដើម្បីគាំទ្រនូវការចំណាយប្រចាំថ្ងៃប្រចាំខែ រហូតដល់ពេលបោះឆ្នោត ដើម្បីឱ្យសកម្មភាពនេះទ្រទ្បើង រហូតប្រយោជន៍ដល់ពលរដ្ឋខ្មែរគាត់បានយល់ និងឱ្យពួកគាត់បោះឆ្នោតឱ្យគណបក្សសង្គ្រោះជាតិគ្រប់ៗគ្នា ។

**អ៊ុម លឿម :** ដោយសារតែលោកជំទាវជាឥស្សរៈជនដ៏សំខាន់មួយរូបរបស់គណបក្ស សម រង្ស៊ី ជាពិសេសនោះលោកជំទាវក៏ជាមនុស្សម្នាក់ដែលស្និតនឹងលោក សម រង្ស៊ី បំផុត ដូច្នេះតើលោកជំទាវអាចព្យាករណ៍ ឬមានសុទិដ្ឋិនិយមដែរទេ ថាលោក សម រង្ស៊ី អាចវិលចូលស្រុកដើម្បីបន្តអាជីពនយោបាយរបស់ខ្លួនដោយគ្មានទោសទ័ណ្ឌដែរឬទេ ?

**មូរ សុខហួ :** បេសកកម្មរបស់លោក ប៉ុល ហំម និងខ្ញុំមកកាន់សហរដ្ឋអាមេរិក នាពេលនេះក៏ជាផ្នែកមួយក្នុងការធ្វើឱ្យរដ្ឋាភិបាលសហរដ្ឋអាមេរិក ព្រមទាំងសមាជិកសភាព្រឹទ្ធ សភារបស់អាមេរិកឱ្យយល់ថាការបោះឆ្នោតនៅ តទៅទំព័រទី ១២

---

គ.ព.ក
CFC-CBC

# គណៈកម្មាធិការព្រំដែនកម្ពុជា

សមាគម មិនជាប់ពាក់ព័ន្ធ នឹង គណៈបក្ស នយោបាយ

Comité des Frontières du Cambodge ( C F C ) — Cambodia's Border Committee ( C B C )

ASSOCIATION NON APPARENTEE AU PARTI POLITIQUE ASSOCIATION UNAFFILIATED TO A POLITICAL PARTY

## គណកម្មាធិការព្រំដែនកម្ពុជាប្រទេសបារាំង និងក្នុងពិភពលោក

បារីសថ្ងៃទី ២០ តុលា ឆ្នាំ២០១២

## ផលវិបាកនៃសន្ធិសញ្ញាដែលបានចុះជាមួយប្រទេសវៀតណាម

ក្នុងឆ្នាំ១៩៧៩-១៩៨២-១៩៨៣-១៩៨៥-២០០៥

សៀន ប៉េងសែ

ក/ សន្ធិសញ្ញាចុះថ្ងៃទី ១៨ កុម្ភៈ ១៩៧៩ (តពីលេខមុន)

(យោងតាមការយកព័ត៌មានរបស់សារព័ត៌មានបារាំងឡឺម៉ុងលេខ៤៨៥៦ ចុះថ្ងៃទី១៥ មិថុនា ១៩៧៥ និងលេខ ៥៥០៤ ចុះថ្ងៃទី ១២ សីហា ឆ្នាំដដែល) ។

លោក ហ៊ុន សែន គួរតែរៀនពីប្រវត្តិសាស្ត្រ និងពីសិទ្ធិរបស់ប្រទេសកម្ពុជាបន្តិចសិន ដើម្បីចៀសវាងការនិយាយ ឬការចុះហត្ថលេខាណាមួយដោយផ្តេសផ្តាសដែលធ្វើឱ្យខូចដល់ឧត្តមប្រយោជន៍របស់ប្រទេស ។

### ផលវិបាកនៃសិទ្ធិសញ្ញាទាំងនេះ

ក្នុងចំណោមសិទ្ធិសញ្ញា និងកិច្ចព្រមព្រៀងដែលបានលើកមកខាងលើនេះ សាធារណរដ្ឋសង្គមនិយមវៀតណាមបានផ្អែកទៅលើកិច្ចព្រមព្រៀងស្តីពី"ទឹកប្រវត្តិសាស្ត្រ"ចុះថ្ងៃទី៧ ខែកក្កដា ១៩៨២ ដើម្បីដាក់សេចក្តីថ្លែងការណ៍ចំនួនពីរនៅមហាសិន្និបាតអង្គការសហប្រជាជាតិ និងចុះហត្ថលេខាលើសន្ធិសញ្ញាមួយជាមួយប្រទេសថៃឡង់ ។

### សេចក្តីថ្លែងការណ៍នៅ អសប

សាធារណរដ្ឋសង្គមនិយមវៀតណាម បានដាក់សេចក្តីថ្លែងការណ៍ពីរនៅ អសប មួយចុះថ្ងៃ ១២ ខែ វិច្ឆិកា ១៩៨២ និងមួយទៀតនៅថ្ងៃ ៥ ខែមិថុនា ១៩៨៤ ដែលក្នុងនោះ ប្រទេសវៀតណាមបានទាមទារឱ្យប្រទេសទាំងអស់ដែលជាសមាជិករបស់ អសប គោរពនូវបន្ទាត់មូលដ្ឋានថ្មីនៃសមុទ្រដែនដី និងលំហរអាកាសថ្មីរបស់ប្រទេសវៀតណាម ដែលទើបនឹងកាត់យកដីប្រទេសកម្ពុជាមកដោយអំណាចនៃកិច្ចព្រមព្រៀងនេះ ។

ប្រសិនបើសាធារណរដ្ឋសង្គមវៀតណាមមានចិត្តស្មោះ ហើយប្រសិនបើមិនបានចំណេញ ទឹកដីអ្វីថ្មីដោយសារសន្ធិសញ្ញា និងកិច្ចព្រមព្រៀងទាំងនេះទេនោះ នោះប្រាកដជាពុំមានសេចក្តីថ្លែងការណ៍ណាមួយថ្មី ដាក់នៅមហាសន្និបាត អង្គការសហប្រជាជាតិនោះឡើយ ។

ក្នុងចំណោមតតិយៈប្រទេសក្នុងតំបន់សាធារណរដ្ឋសិង្ហបូរី នៅថ្ងៃទី៥ ខែធ្នូ ១៩៨៦ បានតវ៉ានឹងសេចក្តីថ្លែងការណ៍របស់ប្រទេសវៀតណាមទាំងនេះ ដោយបានទុកជាទង្វើផ្ទុយនឹងគោលការណ៍ច្បាប់អន្តរជាតិ ។

នៅក្នុងជំនាន់នោះដែរ នៅថ្ងៃទី១២ ខែ មិនា ១៩៨៦ សម្តេចនរោត្តម សីហនុ ក្នុងឋានៈព្រះអង្គជាប្រធានរដ្ឋាភិបាលចំរុះបានធ្វើសេចក្តីថ្លែងការណ៍មួយទុកសន្ធិសញ្ញា និងកិច្ចព្រមព្រៀងដែលបានចុះរវាងសាធារណរដ្ឋសង្គមនិយមវៀតណាម និងសាធារណរដ្ឋប្រជាមានិតកម្ពុជានោះ ជាមោឃៈ និងមិនបានការ ។

### កិច្ចព្រមព្រៀងទ្វេភាគីសាធារណរដ្ឋសង្គមនិយមវៀតណាម និងប្រទេសថៃឡង់

មួយវិញទៀត នៅថ្ងៃ១១ ខែសីហា ១៩៩៧ ឆ្លៀតឱកាសមានកិច្ចព្រមព្រៀងឆ្នាំ ១៩៨២ នេះ ប្រទេសវៀតណាមបានចុះហត្ថលេខាម្នាក់ឯងលើសន្ធិសញ្ញាទ្វេភាគីមួយទៀត ជាមួយប្រទេសថៃឡង់ ដើម្បីកំណត់តំបន់សមុទ្រថ្មីនៃប្រទេសទាំងពីរនៅលើផលប្រយោជន៍ខ្មែរ ដែលធ្វើឱ្យខ្មែរបានបាត់បង់តំបន់សមុទ្ររបស់ខ្លួនអស់មួយចំនួនមួយភាគបី(៣០ ០០០គម²)បន្ថែមទៀត ។

ចំពោះសន្ធិសញ្ញានេះលោក ហ៊ុន សែន ខ្លួនឯងបានធ្វើការតវ៉ាទៀតផង ក្នុងពេលដែលទៅធ្វើទស្សនកិច្ចជាផ្លូវការណ៍នៅប្រទេសថៃឡង់ នៅថ្ងៃទី ៧ ខែឧសភា ឆ្នាំ ១៩៩៨ ប៉ុន្តែប្រទេសនេះបានឆ្លើយថា ឱ្យលោក ហ៊ុន សែន ទៅតវ៉ាជាមួយប្រទេសវៀតណាមវិញទៅដែលបានប្រើកិច្ចព្រមព្រៀងឆ្នាំ១៩៨២ ក្នុងការធ្វើសន្ធិសញ្ញាជាមួយប្រទេសថៃឡង់នេះ ។

### គ-កិច្ចព្រមព្រៀង និងសន្ធិសញ្ញាថ្ងៃ ទី ២០កក្កដា ១៩៨៣

កិច្ចព្រមព្រៀងថ្មីស្តីពី"លក្ខន្តិកៈព្រំដែន"និងសន្ធិសញ្ញាថ្មីស្តីពី"គោលការណ៍ដំណោះស្រាយបញ្ហាព្រំដែន"ត្រូវបានធ្វើឡើងតាំងបទបញ្ហាក្នុងការបង្កើត និងការកំណត់តំបន់ព្រំដែនលើការរស់នៅរបស់ប្រជាពលរដ្ឋ ការធ្វើជំនួញជួញដូរ និងការចេញចូលដោយសេរី ឆ្លងកាត់ព្រំដែនប្រទេស

តទៅទំព័រទី៧

ឌី ឃែមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស  អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌី ឃែមបូឌា ដេលី  ច្បាប់ចេញផ្សាយថ្ងៃ ពុធ ទី០៧ ខែវិច្ឆិកា ឆ្នាំ២០១២

## ក្រុមទី៣នៃកងកម្លាំងរក្សាសន្តិភាពកម្ពុជា ចេញដំណើរទៅលីបង់ចូលរួមរក្សាសន្តិភាព

**ខេមបូឌា ដេលី**

កងកម្លាំងរក្សាសន្តិភាពកម្ពុជាចំនួន២០នាក់បានចេញដំណើរទៅប្រទេសលីបង់ជាទីដែលពួកគេនឹងចូលរួមញក្នុងបេសកកម្មរក្សាសន្តិភាពអង្គការសហប្រជាជាតិនៅទីនោះ និងចូលសកម្មភាពដោះមីន។

លោកឧត្តមសេនីយ៍ឯក សែម សុវណ្ណី អគ្គនាយកមជ្ឈមណ្ឌលជាតិទទួលបន្ទុកកងកម្លាំងរក្សាសន្តិភាពបោសសម្អាតមីន និងគ្រឿងផ្ទុះសល់ពីសម័យសង្គ្រាម បានមានប្រសាសន៍ថា កងកម្លាំងទាំងនេះ ជាអ្នកឯកទេសខាងដោះមីន និងយុទ្ធភណ្ឌមិនទាន់ផ្ទុះ (UXO) ហើយក៏នឹងជួយស្ថាបនាផ្លូវថ្នល់ផងដែរ។

លោកឧត្តមសេនីយ៍ឯក សែម សុវណ្ណី បានមានប្រសាសន៍នៅឯពិធីជូនដំណើរពីក្រសួងមហាផ្ទៃថា កងកម្លាំងនេះ គឺជាកងកម្លាំងទី៣ នៃកងកម្លាំងថែរក្សាសន្តិភាពកម្ពុជា ដែលនិងត្រូវបញ្ជូនទៅកាន់ប្រទេសលីបង់ ដើម្បីជំនួសក្រុមទី២ ដែលត្រូវវិលត្រឡប់មកកាន់មាតុភូមិវិញនៅចុងខែនេះ បន្ទាប់ពីបេសកកម្មរយៈពេលមួយឆ្នាំ ។

យោងតាមទិន្នន័យដោយមជ្ឈមណ្ឌលជាតិទទួលបន្ទុកកងកម្លាំងរក្សាសន្តិភាពបោសសម្អាតមីន និងគ្រឿងផ្ទុះសល់ពីសម័យសង្គ្រាមបានឱ្យដឹងថា ចាប់តាំងពីចាប់ផ្តើមបញ្ជូនកងកម្លាំងរក្សាសន្តិភាពទៅបរទេសកាលពីឆ្នាំ២០០៧ មកប្រទេសកម្ពុជាបានបញ្ជូនទាហានចំនួន ១.២៣៧នាកហើយ ដើម្បីចូលក្នុងបេសកកម្មអង្គការសហប្រជាជាតិនៅស៊ូដង់ខាងត្បូងប្រទេស ឆាដ សាធារណៈរដ្ឋអាហ្វ្រិកកណ្តាល និងប្រទេសស៊ីរី៕

## ចាប់ផ្តើមសាងសង់ព្រះមេរុសម្រាប់បូជាបរមសព ព្រះមហាវិរក្សត្រនរោត្តម សីហនុ

**ខេមបូឌា ដេលី**

នៅក្នុងរាជធានីភ្នំពេញគេបានចាប់ផ្តើមសាងសង់ព្រះមេរុសម្រាប់បូជាព្រះបរមសពសម្តេចឪ ដែលនឹងត្រូវបូជានៅក្នុងខែកុម្ភៈ។

កម្មករនៅវាលព្រះមេរុ នៅទល់មុខសារមន្ទីរជាតិ និងនៅក្បែរព្រះបរមរាជវាំង បានជីកកកាយមួយផ្នែកធំនៃតំបន់ដែលមានស្មៅក្រាស់នេះ។

ព្រះអង្គម្ចាស់ ស៊ីសុវត្ថិ ធម្មាកោ ដែលជាប្រធានខុទ្ទកាល័យព្រះបរមសពសម្តេចឪ បានមានបន្ទូលថា "ពួកគេកំពុងជីកដី ដើម្បីរៀបចំវាលព្រះមេរុសម្រាប់ពិធីបូជាព្រះបរមសពដែលនឹងត្រូវប្រព្រឹត្តទៅក្នុងខែកុម្ភៈ"។

ព្រះមហាវិរក្សត្រនរោត្តម សីហនុ បានយាងចូលទិវង្គតដោយសារគាំងបេះដូងនៅក្នុងទីក្រុងបេកាំងកាលពីថ្ងៃទី១៥ ខែតុលា ហើយព្រះបរមសពរបស់ព្រះអង្គបច្ចុប្បន្នកំពុងតម្កល់នៅក្នុងព្រះបរមរាជវាំង។

អតីតព្រះមហាវីរក្សត្រអង្គនេះ និងត្រូវបូជាក្នុងពិធីដ៏ល្អិតល្អន់មួយទៅតាមប្រពៃណីរបស់រាជវង្សខ្មែរ។ ព្រះរាជពិធីបុណ្យព្រះសពបែបនេះ មិនបានអនុវត្តចាប់តាំងពីឆ្នាំ១៩៦០ មកម្ល៉េះ។

ព្រះអង្គម្ចាស់ ធម្មិកោ បានមានព្រះបន្ទូលថា នៅពេលឆាប់ៗនេះកម្មករនឹងស្ថាបនា "ព្រះមេរុ" មយយនៅលើវាលព្រះមេរុ ដែលមានលក្ខណៈដូចគ្នានឹងព្រះមេរុបូជាព្រះបរមសពព្រះមហាក្សត្រ សុរាម្រឹត កាលពីជាង៥០ឆ្នាំមុន។

ពីធីបូជាព្រះបរមសពទៅតាមទំនៀមទម្លាប់ព្រះរាជវង្សខ្មែរ ត្រូវបានរៀបចំឡើងតំណាងឱ្យភ្នំព្រះមេរុនៅក្នុងទេវកថានៃសាសនាហុណ្ឌ៕

## សំណុំរឿងឃាតកម្មលោក ជា វិជ្ជា ត្រឡប់មកកាន់តុលាការម្តងទៀត បន្ទាប់ពីពន្យាពេលអស់៨ឆ្នាំ

**ខេមបូឌា ដេលី**

បុរសពីរនាក់ដែលត្រូវបានតុលាការចោទប្រកាន់កាលពីឆ្នាំ២០០៤ ពីបទធ្វើឃាតលោក ជា វិជ្ជា មេដឹកនាំសហជីពនឹងត្រូវបានគេដឹងជាទូទៅថា ជាមនុស្សត្រូវគេទម្លាក់កំហុសលើនោះនឹងត្រូវបង្ហាញខ្លួននៅសាលាឧទ្ធរណ៍ ដើមចូលរួមសវនាការជំនុំជម្រះឡើងវិញនៅថ្ងៃនេះ ដោយគិតមកទល់នឹងពេលនេះជិតបួនឆ្នាំហើយ បន្ទាប់ពីតុលាការកំពូលបានដោះលែងពួកគេ ហើយបានបង្គាប់ឱ្យមានការស៊ើបអង្កេតសំណុំរឿងនេះឡើងវិញ។

លោក ប៊ន សំណាង និងលោក សុខ សំអឿន ត្រូវបានចាប់ខ្លួនមួយសប្តាហ៍បន្ទាប់ពីលោក ជា វិជ្ជា ត្រូវបានគេសម្លាប់នៅក្នុងរាជធានីភ្នំពេញកាលពីថ្ងៃទី២២ ខែមករា ឆ្នាំ២០០៤។ ក្រោយមកក្នុងឆ្នាំដដែលនោះពួកគេត្រូវបានតុលាការផ្តន្ទាទោសម្នាក់ៗឱ្យជាប់ពន្ធនាគាររយៈពេល២០ឆ្នាំ បើទោះពួកគេប្រកែកថា ជាការទម្លាក់កំហុសក៏ដោយ។

ថ្វីបើបទចោទប្រកាន់ត្រូវបានតម្កល់ ក៏ដោយតែតុលាការកំពូលបានដោះលែងបុរសទាំងពីរនាក់ឱ្យនៅក្រៅឃុំ កាលពីចុងឆ្នាំ២០០៨ ហើយបានបង្គាប់ឱ្យសាលាឧទ្ធរណ៍បើកការស៊ើបអង្កេតឡើងវិញលើសំណុំរឿងឃាតកម្មនេះ។ សាលាឧទ្ធរណ៍បានបង្វិលសំណុំរឿងនេះទ្រឡប់ទៅកាន់សាលាដំបូងរាជធានីភ្នំពេញវិញដែលដំបូងឡើយបានចោទប្រកាន់បុរសទាំងពីរនាក់នេះ កាលពីឆ្នាំ២០០៩។

សាលាឧទ្ធរណ៍បានកំណត់កាលបរិច្ឆេទ បើកសវនាការឡើងវិញក្នុងខែសីហា ឆ្នាំ២០១១ ប៉ុន្តែបានផ្អាកទៅវិញនៅពេលដល់ថ្ងៃកំណត់។

មេធាវីរបស់លោក ប៊ន សំអាត និងលោក សុខ សំអឿន បានលើកឡើងថា កូនក្តីរបស់ខ្លួនបានត្រៀមខ្លួនចូលរួមសវនាការនៅថ្ងៃនេះ។

លោក ជុំ សុវណ្ណាលី មេធាវីរបស់លោក ប៊ន សំណាង បានមានប្រសាសន៍ថា "ខ្ញុំមិនអានិយាយបានថាតើខ្ញុំអាចការពារកូនក្តីរបស់ខ្ញុំនឹងអនុញ្ញាតឱ្យគាត់នៅក្រៅឃុំ បានឬក៏អត់នោះទេ ពីព្រោះខ្ញុំចាំបាច់រង់ចាំទទួលដំណឹងថា ភ័ស្តុតាងមានអ្វីខ្លះ ដែលសាលាដំបូងរាជធានីភ្នំពេញបានរកឃើញ"។

លោក កៅ ទី មេធាវីតំណាងឱ្យគ្រួសារសពលោក ជា វិជ្ជា បានលើកឡើងថា លោកសង្ឃឹមថា ការបើកសវនាការជំនុំជម្រះឡើងវិញ នឹងទទួលបានជោគជ័យបន្ទាប់ពីការបើកសវនាការលើកមុនបានបរាជ័យនោះ ។

លោកបានមានប្រសាសន៍ថា "ខ្ញុំសង្ឃឹមថា តុលាការនឹងស្វែងរកឱ្យឃើញឧក្រិដ្ឋកម្មជនពិតប្រាកដ ដើម្បីផ្តល់យុត្តិធម៌ឱ្យគ្រួសារលោក ជា វិជ្ជា"។

តាំងពីដំបូងមកម្ល៉េះលោក ប៊ន សំណាង និង លោក សុខ សំអឿន សុទ្ធតែបានអះអាងថា ខ្លួនមិនមានជាប់ពាក់ព័ន្ធនៅក្នុងការសម្លាប់របស់មេដឹកនាំសហជីពដ៏ល្បីល្បាញនេះទេ ហើយបានបង្ហាញតុលាការអំពីការសំអាងដ៏ជាក់ស្តែង អំឡុងការបើកសវនាការដំបូងរបស់ពួកគេ។

ក្រុមអ្នកអង្កេតការអន្តរជាតិ និងអង្គការសិទ្ធិមនុស្សក្នុងស្រុកបានលើកឡើងថា ទាំងការស៊ើបអង្កេត និងកាបើកសាវនាការសុទ្ធតែធ្វើឡើងដោយមិនត្រឹមត្រូវទាល់តែសោះ។ សម្តេចឪព្រះបាទនរោត្តម សីហនុ បានព្រះទ័យរបស់ព្រះអង្គថា បុរសទាំងពីរនាកនេះសុទ្ធតែមិនមានកំហុសនៅអំពើឃាតនេះទេ។ ហើយកាលពីឆ្នាំ២០០៦ លោក ហេង ពៅ អតីតស្នងការនគរបាលស៊ើបអង្កេតបុរសទាំងពីររូបនេះ ហើយដែលឥឡូវកំពុងតែជាប់ពន្ធនាគារយ៉ាងយូរពីបទជាប់ពាក់ព័ន្ធនឹងអំពើឃាតកម្ម និងបទល្មើសធ្ងន់ធ្ងរផ្សេងៗទៀតបានប្រាប់ទស្សនាវដ្តីបារាំងមួយថា បុរសទាំងពីរនាក់ត្រូវគេទម្លាក់កំហុស៕

## ការបើកសវនាការរបស់តុលាការក្រុងឡាអេ ស្តីពីប្រាសាទព្រះវិហារ នឹងធ្វើឡើងក្នុងខែមេសា

**ខេមបូឌា ដេលី**

ក្រុមមន្ត្រីរដ្ឋាភិបាលបានលើកឡើងថា នៅខែមេសាខាងមុខនេះតុលាការយុត្តិធម៌អន្តរជាតិ (International Court of Justice) នឹងបើកសវនាការផ្ទាល់មាត់រវាងប្រទេសលកម្ពុជា និងប្រទេសថៃអំពីទឹកដីមានជម្លោះនៅជុំវិញប្រាសាទព្រះវិហារ។

លោក វ៉ា គឹមហុង ប្រធានគណៈកម្មាធិការព្រំដែនរបស់កម្ពុជាបានមានប្រសាសន៍នៅក្រៅសិក្ខាសាលាស្តីពីមិត្តរបស់ប្រាសាទព្រហវិហារ ដែលធ្វើឡើងក្នុងរាជធានីភ្នំពេញថា "ការបើកសវនាការផ្ទាល់មាត់ជាមួយភាគីថៃនឹងធ្វើឡើងនៅក្នុងខែមេសា ដូច្នេះយើងអាច"។

លោក គឹមហុង បាបដិសេដមិននិយាយថា តើភាគីណាជាអ្នកសុំឱ្យបើកសវនាការជំនុំជម្រះ ឬបញ្ហាអ្វីខ្លះនឹងត្រូវភាគីកម្ពុជាលើកឡើងនោះទេ។

សវនាការជំនុំជម្រះទាក់ទង់នឹងសំណើរបស់រដ្ឋាភិបាលកម្ពុជា កាលពីចុងខែមេសាឆ្នាំ២០១១ ដោយស្នើឱ្យតុលាការយុត្តិធម៌អន្តរជាតិបកស្រាយសាលក្រមឆ្នាំ១៩៦២ ដែលប្រគល់ប្រាសាទព្រះវិហារមកឱ្យប្រទេសកម្ពុជាវិញ និងកំណត់ថា តើសេចក្តីសម្រេចនេះពិតជាបានផ្តល់កម្មសិទ្ធិមកឱ្យប្រទេសកម្ពុជាវិញ ដែរឬទេទូវទឹកដីក្បែរនោះទំហំ៤.៦គីឡូម៉ែត្រក្រឡាដែលប្រទេសថៃបានទាមទារ។

លោក ជុច ភឿន ប្រធានអាជ្ញាធរជាតិព្រះវិហាររបស់កម្ពុជាបានមានប្រសាសន៍ថា កាលពីខែមុនថា តុលាការក្រុងឡាអេសង្ឃឹមថា នឹងចេញសេចក្តីសម្រេច នៅក្នុងខែមេសាមិនមែន ដូចគម្រោងលើកមុនថា ប្រកាសក្នុងខែនេះទេ។ សេចក្តីប្រកាសត្រូវបានធ្វើឡើងនៅចំពោះមុខនិស្សិតសាកលវិទ្យាល័យជាង៥០០នាក់ដែលទីស្តីការគណៈរដ្ឋមន្ត្រីអញ្ជើញចូលរួមស្តាប់បាឋកថា និងទស្សនាខ្សែវីដេអូស្តីពីជម្លោះអំពីប្រាសាទព្រះវិហារ។ ប្រទេសថៃ និងប្រទេសកម្ពុជាបានប៉ះទង្គិចគ្នាដោយអាវុធជាច្រើនលើកនៅជុំវិញទឹកដីមានជម្លោះនេះ ហើយបានបណ្តាលឱ្យមនុស្សស្លាប់ក្នុងប៉ុន្មានឆ្នាំនេះ ប៉ុន្តែភាគីទាំងពីរបានដកកងទ័ពចេញវិញ កាលពីក្នុងខែកក្កដា តាមបញ្ជាពីតុលាការយុត្តិធម៌អន្តរជាតិ ដែលជាវិធានការបណ្តោះអាសន្នមួយមុននឹងការសម្រេចសេចក្តីចុងក្រោយ៕

# ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទនេះកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ពុធ ទី០៧ ខែវិច្ឆិកា ឆ្នាំ២០១២

## World Court to hold Preah Vihear Hearing

The International Court of Justice (ICJ) will hold a verbal hearing with Cambodia and Thailand over diputed land around Preah Vihear Temple in April, govemment officials said " A verbl hearing with the Thai Party will be held in April so that [we can] have a question and answer session face to face with courts," said the chairman of cambodia´s bordercommittee, Var Kimhong, on the sidelines of a Friends of Preah Vihear seminar held in Phnom Penh. Mr. Kimhong declined to say what issues would be raised by the Cambodian side at the hearing, white relates to a request filed in April 2011 by the Cambodian govemment asking the ICJ to "interpret" a 1962 ruling that awarded the temple to Cambodia, and to determine whether the ruling also effectly gave the country ownership of an adjacent 4.6 square km claimed by Thailand. Chuch Phoeun, chairman of Cambodia´s National Authority for Preah Vihear, Said last month that The Hague-base court hope to come a decision by April.

Thailand and Cambodia have fought several deadly clashes over the contested land in recent years, but both side with drew their troops in July as a provisional measure in advance of the ICJ´s decision.

## Chea Vichea Murder Case Back in Court

The two men convicted of-and widely believed framed for-the 2004 assassination of union leader Chea Vichea are set to appear are the Appeal Court for their retrail today, nearly four years after the Supreme Court released them and ordered a reinvestigation of the case.

Born Samnang and Sok Som Oeun were arrested a week after Chea Vichea was gunned down in Phnom Penh on January 22, 2004. They were convictedlater that year amid an outcry over percieved coverup in the killing, and sentenced to 20 years in jail each.

Though upholding the charges, the Supreme Court released the pair on bail in late 2008 and ordered the Appeal Court to reinvestingate the killing. The appeal Court kicked the case back down to the Phnom Penh Municipal Court, which had originally convicted the two men in 2009.

The Appeal Court had scheduled a date for the retrail in August 2011, but postponed the proceedings indefinitely on the day the hearing was due to take place.

Mr.Samnang and Mr. Sam Oeun´s lawyers said that their clients were ready to attend the hearing today.

"I cannot say whether I can protect my client and let him stay out of custody because I need to hear what evidence the Phnom Penh court found," said Chum Sovannaly, Mr. Samnang´s lawyer.

Kao Ty, a lawyer representing Chea Vichea´s family, said he hoped the retrial would succeed where the original had failed.

"I hope the court will find real perpettrators to give justice to Chea Vichea´s family," he said.

Mr. Samnang and Som Oeun both professed their innocence in the outspoken union leader´s death from the very start and presented the court with solid alibis during their original trail.

International observers and human rights groups have said both the investigation and trail were deeply flawed. The late Norodom Sihanouk wrote a letter expressing his belief that both men were innocent of the murder. And in 2006, former Phnom Penh municipal police chief Heng Pov, who had led the police in vestigation, and who is now serving a lengthy prison term for murder and another serious crimes, told a French magazine that both men had been framed for the killing.

## Work Starts on Funeral Pyre for Late King Father

Work began in Phnom Penh to create a funeral pyre for the late King Father Norodom Sihanouk, who will be cremated in February. Workers at Veal Mean, the field in front of the National Museum and adjacent to the Royal Palace, have dug up a large part of the previously grass-covered. " They are digging to prepare the Veal Mean for the cremation ceremony that will be held in February," said prince Sisowath Thomico, whowas the late King Father´s cabinet chief. Norodom Sihanouk died of heart attack in Beijing on Octomber 15 and his body is currently lying in state at the palace. The form King is set to be cremated in an elaborate ceremony in the tradition of Khmer monarchs. Such a royal funeral has not been put into pratice since 1960. Prince Thomico said the works would soon construct a "monument" on the field, which would "look exactly like" the tiered tower on which King Suramarit was cremated more than five decades ago. The funeral pyre in a Khmer royal funeral is arranged to represent the sacred Mount Meru of Hindu mythology.

តមកពីទំព័រទី ៥

## គណកម្មាធិការព្រំដែនកម្ពុជា....

ទាំងពីរ ដែលជាការធ្វើឱ្យខូចប្រយោជន៍ដល់ខ្មែរ ។

សន្ធិសញ្ញាថ្មីមួយទៀត ត្រូវបានចុះហត្ថលេខាដោយភាគីទាំងពីរ ដើម្បីធ្វើឱ្យកាន់តែច្បាស់លាស់ថែមទៀត ជាផ្លូវការនូវការកំណត់ ព្រំដែនថ្មីរវាងប្រទេសទាំងពីរដោយមិនគិតពីការទទួលស្គាល់នានាដែលរដ្ឋាភិបាលវៀតណាមខាងជើង និងរដ្ឋាភិបាលរណសិរ្សជាតិរំដោះវៀតណាមខាងត្បូងបានធ្វើជាញឹកញាប់ទទួលស្គាល់អធិបតេយ្យ-ភាព និងបូរណភាពទឹកដីរបស់ប្រទេសកម្ពុជានៅក្នុងអំឡុងឆ្នាំ១៩៦០នោះឡើយ ។

លោក ហ៊ុន សែន បាន អះអាងថា សន្ធិសញ្ញាលើបញ្ហា ទឹកដីដែលលោកបានធ្វើជាមួយក្រុងហាណូយក្នុងឆ្នាំ១៩៨៣ និង ១៩៨៥នោះ គឺស្របទៅនឹងផែនទីរបស់ប្រទេសកម្ពុជាដែល សម្តេចនរោត្តម សីហនុ បានយក ទៅតម្កល់នៅអង្គសហប្រជាជាតិក្នុងឆ្នាំ១៩៦៤ ។ ក្នុងរឿងនេះ គួរតែលោក ហ៊ុន សែន សួរទៅខ្មែរនានាដែលរស់នៅៗតាមតំបន់ព្រំដែននោះមើលមានលោក ហេង សំរិន ជាដើម ។ (បច្ចុប្បន្នប្រធានរដ្ឋសភា) តើហេតុ ដូចម្តេចបានជាដីធ្លី និងផ្ទះសម្បែងរបស់អ្នកទាំងអស់នោះ ដែលកាលពីដើមក្នុងឆ្នាំអំឡុងឆ្នាំ ១៩៦០ ស្ថិតនៅក្នុងទឹកដីខ្មែរសោះជាច្រើនគីឡូម៉ែត្រពីព្រំដែន ឥឡូវនេះបែរជាទៅនៅក្នុងទឹកដីយួនទៅវិញ ។

ព្រះមហាក្សត្រសម្តេចព្រះនរោត្តម សីហនុ កាលព្រះអង្គនៅសោយរាជ្យពីឆ្នាំ១៩៩៣ ដល់ ២០០៤ ព្រះអង្គបានផ្តន្ទាយ៉ាងច្បាស់លាស់នូវសន្ធិសញ្ញាដែលបានធ្វើក្នុងអំឡុងឆ្នាំ១៩៨០នេះ ដែល "បានធ្វើឱ្យមានការប៉ះពាល់ដល់គំនូសព្រំដែនដីគោក និងព្រំដែនសមុទ្ររបស់ប្រទេសកម្ពុជាដែលមានពីឆ្នាំ ១៩៦៣ ដល់ ១៩៦៩" ហើយព្រះអង្គ" និងមិនចុះហត្ថលេខា"ទទួលស្គាល់សន្ធិសញ្ញាទាំងនោះឡើយ (D Sihanouk ne signera pas) ។ ក្រោយមក ព្រះករុណាបានថ្កោលទោសលោក វ៉ា គីមហុង បាន ដែលបង្ហាញដល់ព្រះអង្គនូវ "ផែនទីក្លែងក្លាយមួយរបស់ប្រទេសយើង (ប្រទេសកម្ពុជា) ផែនទីដែលលោកនេះបានអះអាងថា (ជាការភូតកុហក) ជាផែនទីរបស់សង្គមរាស្រ្តនិយម" -របបសង្គមរាស្រ្តនិយមរបស់សម្តេចនរោត្តម សីហនុពីឆ្នាំ ១៩៥៥ ដល់ ១៩៦៩ (D Sihanouk) ។

### ឃ-កិច្ចព្រមព្រៀងចុះថ្ងៃ ២៧ ធ្នូ ១៩៨៥

លោកម ហ៊ុន សែន បានសរសើរខ្លួនឯងពី "លទ្ធផលដ៏ត្រចះត្រចង់" ដោយសារការបូកបញ្ចូលគ្នារវាងផែនទី ដើម្បីធ្វើឱ្យការកំណត់នៃដីគោក" មានភាពកាន់តែច្បាស់លាស់" ថែមទៀត ។ សូមរំលឹកថា ផែនទីប្រទេសកម្ពុជាឆ្នាំ១៩៦៤ ដែលត្រូវបានទទួលស្គាល់ជាអន្តរជាតិនេះ គឺគូសឡើងដោយយោងទៅតាមផែនទីខ្នាត១/១០០ ០០០ របស់វិទ្យាស្ថានជាតិខាងភូមិសាស្រ្តរបស់បារាំងឆ្នាំ១៩៥៣ ដែលក្រោយមកជាមូលដ្ឋានក្នុងការរៀបចំផែនទីភូតព្ភសាស្រ្តប្រទេសកម្ពុជាខ្នាត ១/២០០ ០០០ ធ្វើពីឆ្នាំ១៩៦៣ ដល់១៩៧២ ។

គឺផែនទីនេះហើយដែលបានយកមកប្រើនៅពេលសន្និសីទនៅក្រុង ស៊្វីណែវ ក្នុងឆ្នាំ ១៩៥៤ និងក្នុងពេលថ្មីៗនេះក្នុងឆ្នាំ១៩៩២ ប្រើប្រាស់ដោយអ៊ុនតាក់ ។ គេអាចសង្កេតឃើញថា សន្ធិសញ្ញារវាងក្រុងហាយណូយ និងលោក ហ៊ុន សែន ចុះថ្ងៃទី ២០ កក្កដា ឆ្នាំ ១៩៨៣ ទាំងនេះស្តីពី "គោលការណ៍ដំណោះស្រាយបញ្ហាព្រំដែន" និងលើ "លក្ខន្តិកៈព្រំដែន" មិនបាននិយាយពីផែនទី អ៊ុយទេអិម របស់យួន និងអាមេរិកនោះឡើយ ផ្ទុយទៅវិញ គេបានឃើញនៅក្នុងសន្ធិសញ្ញាចុះថ្ងៃទី២៧ ធ្នូ១៩៨៥ នោះវិញ ស្តីពី "ការកំណត់ព្រំដែន" "ដូចគ្នានេះដែរ នៅក្នុងសន្ធិសញ្ញាបំពេញបន្ថែមឆ្នាំ២០០៥ ។ លោក ហ៊ុន សែន និងរដ្ឋមន្ត្រីរបស់លោកពុំដែលបានផ្តល់ព័ត៌មានអ្វីដល់សាធារណជនពីអត្ថិភាពនៃផែនទីខ្នាត ១/៥០ ០០០ នេះម្តងណានោះឡើយ : មាត្រា២នៃរដ្ឋធម្មនុញ្ញរបស់ប្រទេសកម្ពុជាបានកំណត់តែពីផែនទីរបស់ឥណ្ឌូចិនបារាំងសែសដែលបានរៀបចំឡើងរវាងពីឆ្នាំ១៩៣៣ និង១៩៥៣ ខ្នាត ១/១០០ ០០០ តែប៉ុណ្ណោះ ។

ផ្ទុយទៅវិញ សន្ធិសញ្ញារវាងក្រុងហាណូយ និងលោក ហ៊ុន សែន ចុះថ្ងៃទី២៧ ខែធ្នូ ឆ្នាំ១៩៨៥ ដែលបានធ្វើដោយយកតាមរបៀប អ៊ុយតេអិម បានយកផ្ទាំងផែនទីចំនួន២៦ ផ្ទាំងនៃផែនទីរបស់អតីតឥណ្ឌូចិនបារាំងសែស ខ្នាត ១/១០០ ០០០ ទៅផ្គុំនឹងផែនទីចំនួន៤០ផ្ទាំងផ្សេងទៀត របស់យួន និងអាមេរិកាំង[១(១)] ខ្នាត ១/៥០ ០០០ ។ ក្នុងបញ្ហានេះ លោក ហ៊ុន សែន ត្រូវតែឆ្លើយ តើហេតុអ្វីបានជាលោកទៅទទួលស្គាល់ផែនទីរបស់យួន និងអាមេរិកាំង

មានតលេខក្រោយ

# ក្លូបលវិតណេសរាយការណ៍ពីបរិស្ថាននៅកម្ពុជា

(តពីលេខមុន)

*ការគ្រប់គ្រងសេដ្ឋកិច្ចខុសច្បាប់របស់ទ័ព*

កងយោធពលខេមរភូមិន្ទ (RCAF) មានគោលបំណងយុទ្ធសាស្ត្របន្តិចបន្តួច និងសមត្ថភាពប្រតិបត្តិការគួរឱ្យសង្ស័យ។ ពួកគេចូលរួមយ៉ាងពេញទំហឹងក្នុងកិច្ចព្រមព្រៀងពាក់ព័ន្ធទ្រព្យសម្បត្តិសាធារណៈ គួរឱ្យកត់ចំណាំតាមរយៈករណី ដែលមិនបានលាតត្រដាងពី "តំបន់អភិវឌ្ឍន៍យោធា" ដែលគ្របដណ្តប់លើផ្ទៃដី ៧00,000 ហិកតា (ha) ឬស្មើរតែបួន ភាគរយនៃផ្ទៃដីរបស់ប្រទេសកម្ពុជា[២២] ។ មន្ត្រីជាន់ខ្ពស់របស់កងយោធពលខេមរភូមិន្ទ គឺជាអ្នកសំដែងដ៏សំខាន់ក្នុងសកម្មភាពអាជីវកម្មខុសច្បាប់ ដូចជាការកាប់ឈើ និងការជួញដូរថ្នាំញៀន[២៣] ។ ពួកគេក៏បង្កើតប្រាក់ដ៏ច្រើនពីការតម្រោមកំហែងយកប្រាក់ផងដែរ[២៤] ។

## ២. វិស័យព្រៃឈើរបស់ប្រទេសកម្ពុជា

វិស័យព្រៃឈើរបស់ប្រទេសកម្ពុជា ផ្តល់នូវការពន្យល់បង្ហាញដ៏រស់រវើកជាពិសេសពីរបៀប ដែលអ្នកដឹកនាំរបស់ប្រទេសបានលួចយកទ្រព្យសម្បត្តិសាធារណៈ ។

ក្នុងសង្គ្រាមស៊ីវិលរបស់ប្រទេសកម្ពុជាជាច្រើនឆ្នាំមុន ដែលបានបញ្ចប់ក្នុងឆ្នាំ ១៩៩៨ ទាំងរដ្ឋាភិបាលខ្មែរក្រហម និងភ្នំពេញ បានប្រើ-ប្រាស់ការកាប់ឈើដើម្បីផ្តល់ប្រាក់ដល់យុទ្ធនាការយោធានិងក្រោយមកបានប្រើប្រាស់យុទ្ធនាការយោធាជាលេស សម្រាប់ការកាប់ឈើបន្ថែមទៀត ។ តាំងតែពីពេលនោះមក អ្នកដឹកនាំរបស់ប្រទេសកម្ពុជាបានរកឃើញថា មានការពិបាកក្នុងការទាត់ចោលទម្លាប់ប្រព្រឹត្តចំពោះព្រៃឈើរបស់ប្រទេស ដែលជាប្រាក់ស្មោកគ្រោកសម្រាប់យុទ្ធនាការនយោបាយ ការបង្កើនធនធានផ្ទាល់ខ្លួន និងលើកទឹកចិត្តអតិថិជនសំខាន់ៗ ។

ក្នុងពាក់កណ្តាលទសវត្សរ៍ឆ្នាំ ១៩៩០ រដ្ឋមន្ត្រីរដ្ឋាភិបាលជាន់ខ្ពស់បានផ្តល់ឱ្យជាសម្ងាត់សម្បទានព្រៃឈើរវាងពី ៣០ និង ៤០ ទៅឱ្យក្រុមហ៊ុនដែលគ្រប់គ្រងដោយជនជាតិខ្មែរ និងបរទេស ។ កិច្ចសន្យាត្រូវបានចុះហត្ថលេខាផ្តល់ឱ្យព្រៃឈើជាងប្រាំពីរលានហិកតា៣៩% នៃផ្ទៃដីរបស់ប្រទេសកម្ពុជាក្នុងអំឡុងពេលដែលបំពេញផលប្រយោជន៍យ៉ាងខ្លាំងដល់សម្បទានិកទៅលើសម្បទានរបស់ប្រទេសកម្ពុជា[២៥] ។ សម្បទានិកទាំងអស់បានដំណើរការបំពានច្បាប់ ឬលក្ខខណ្ឌនៃកិច្ចសន្យារបស់ពួកគេ ឬទាំងពីរ ។នៅចុងទសវត្សរ៍នោះពួកគេបានទទួលខុសត្រូវចំពោះការកាប់ឈើខុសច្បាប់ជាច្រើនបំផុតក្នុងប្រទេសកម្ពុជា ។

*កំណែទម្រង់*

ជាដំបូង Global Witness បានចាប់ផ្តើមថ្លែងពីការកាប់ឈើខុសច្បាប់ក្នុងប្រទេសកម្ពុជា ហើយនិងទំនាក់ទំនងរបស់ខ្លួនជាមួយជម្លោះអំពើពុករលួយនិងការរំលោភបំពានសិទ្ធិមនុស្សក្នុងឆ្នាំ១៩៩៥ ។ សម្ពាធអន្តរជាតិលើរដ្ឋាភិបាល ដើម្បីទប់ទល់ការបំផ្លិចបំផ្លាញព្រៃឈើបានរៀបចំឡើង ហើយនៅចុងឆ្នាំ ១៩៩៨ ហ៊ុន សែន បានប្រកាសថាគាត់នឹងដោះស្រាយបទល្មើសព្រៃឈើនិងកំណែទម្រង់ស្ថាប័ន ។បាតុភូតជាក់ច្បាស់របស់នាយករដ្ឋមន្ត្រី កើតឡើងស្របតាមការធ្លាក់ចុះសមត្ថភាពគូបដិបក្ខរបស់គាត់ ដើម្បីប្រកួតប្រជែងចំពោះប្រាក់ចំណូលពីការកាប់ឈើ ។ នេះពាក់ព័ន្ធជាមួយនឹងរដ្ឋប្រហាររបស់គណបក្សប្រជាជនប្រឆាំងនឹងដៃគូចម្រុះហ៊្វុនស៊ិនប៊ិចរបស់ខ្លួន ក្នុងខែកក្កដា ឆ្នាំ ១៩៩៧ ជ័យជំនះរបស់ខ្លួនក្នុងការបោះឆ្នោតជាតិនៅឆ្នាំបន្ទាប់ និងការបំបែកបំបាក់ពួកខ្មែរក្រហមចុងក្រោយ ។

រដ្ឋាភិបាលបង្ក្រាបសកម្មភាពរបស់អ្នកកាប់ឈើខុសច្បាប់ដែលមានទំនាក់ទំនងល្អបានយ៉ាងត្រឹមត្រូវ អនុម័តច្បាប់ថ្មីនិងក្នុងឆ្នាំ ១៩៩៩ យល់ព្រមតែងតាំង Global Witness ជាអ្នកត្រួតពិនិត្យឯករាជ្យទៅលើកិច្ចខិតខំប្រឹងប្រែងរបស់ខ្លួន ដើម្បីប្រយុទ្ធប្រឆាំងបទល្មើសព្រៃឈើ ។ ក្នុងខែ កញ្ញា ឆ្នាំ ២00១ ប្រទេសកម្ពុជាបានចុះហត្ថលេខាលើគំនិតផ្តួចផ្តើមអនុវត្ត និងអភិបាលកិច្ចច្បាប់ព្រៃឈើ (FLEG) តំបន់អាស៊ីបូព៌ា ដោយរដ្ឋាភិបាលប្តេជ្ញាចិត្ត "ចាត់វិធានការណ៍បន្ទាន់ដើម្បីពង្រឹងកិច្ចខិតខំប្រឹងប្រែងថ្នាក់ជាតិ និងពង្រឹងសហប្រតិបត្តិការទ្វេភាគីថ្នាក់តំបន់ និងពហុភាគី ដើម្បីដោះស្រាយចំពោះការរំលោភបំពានច្បាប់ព្រៃឈើ និងបទល្មើសព្រៃឈើ ជាពិសេសការកាប់ឈើខុសច្បាប់ ការធ្វើពាណិជ្ជកម្មខុសច្បាប់ និងអំពើពុករលួយពាក់ព័ន្ធនិងផលប៉ះពាល់អវិជ្ជមានរបស់ពួកគេទៅលើនីតិរដ្ឋ"[២៦] ។

សម្រាប់ផ្នែកមួយរបស់ពួកគេ សម្បទានិកឈើមិនបានអនុវត្តតាមលក្ខខណ្ឌដំណើរការស្តារឡើងវិញ ដែលតម្រូវឱ្យពួកគេបង្កើតផែនការគ្រប់គ្រងព្រៃឈើប្រកបដោយចីរភាព (SFMPs) និងការវាយតម្លៃផលប៉ះពាល់បរិស្ថាន និងសង្គម (ESIAs) ។ មួយចំនួនអនុវត្តការកាប់ឈើខុសច្បាប់ ។ ដោយស្ថិតក្រោមសម្ពាធឱ្យអនុវត្តចុងក្រោយ រដ្ឋាភិបាលបានបញ្ឈប់មួយរយៈនូវប្រតិបត្តិការសម្បទានិកចាប់ពី ខែ មករា ឆ្នាំ ២00២ ។

ក្នុងឆ្នាំ ២00៣ ម្ចាស់ជំនួយអន្តរជាតិ និងរដ្ឋាភិបាលកម្ពុជាបានបង្កើតក្រុមការងារអ្នកពិគ្រោះយោបល់អន្តរជាតិមួយ ដើម្បីអនុវត្តការវាយតម្លៃវិស័យព្រៃឈើដោយឯករាជ្យ (IFSR) និងរៀបចំ "ផែនទីផ្លូវ" សម្រាប់កំណែទម្រង់វិស័យព្រៃឈើ ។ ក្នុងឆ្នាំ ២00៤ អ្នកពិគ្រោះយោបល់ទាំងនេះ បានផ្តល់អនុសាសន៍ឱ្យរដ្ឋាភិបាលបញ្ឈប់ប្រព័ន្ធសម្បទានកាប់ឈើ និងប្រគល់ទំនួលខុសត្រូវគ្រប់គ្រងព្រៃឈើឱ្យក្រុមប្រឹក្សាឃុំ-សង្កាត់ ដែលបានទទួលការបោះឆ្នោតឱ្យជាមួយនឹងរដ្ឋបាលព្រៃឈើ (FA) ដែលដើរតួនាទីចេញច្បាប់ ។ មូលដ្ឋានសម្រាប់គំរូ "ព្រៃភាពជាដៃគូ" គឺជាការផ្តល់អំណាចដល់ប្រជាជនដែលរស់នៅក្នុង និងជុំវិញព្រៃឈើ ហើយការត្រួតពិនិត្យ និងតុល្យភាពស្ថាប័នកាន់តែទូលំទូលាយ មានបំណងកាត់បន្ថយអំពើពុករលួយ ។ទោះយ៉ាងណាក៏ដោយ រដ្ឋាភិបាលបានបង្ហាញនូវភាពសប្បាយរីករាយមានកំណត់ចំពោះសំណើរបស់ IFSR ហើយសហគមន៍ម្ចាស់ជំនួយអន្តរជាតិមិនបានគាំទ្រពួកគេខ្លាំងគ្រប់គ្រាន់ល្មមនោះទេ ។

*រដ្ឋដែលមានតែឈ្មោះវាយប្រហារត្រឡប់វិញ*

ទោះបីជាស្របពេលដែលរដ្ឋមន្ត្រីថ្នាក់ខ្ពស់បានប្តេជ្ញាចិត្តចំពោះដំណើរការកំណែទម្រង់ក៏ដោយ រដ្ឋដែលមានតែឈ្មោះរបស់ប្រទេសកម្ពុជា បានបន្តរកប្រាក់ពីវិស័យព្រៃឈើដដែល ។ មន្ត្រីដដែលនេះដែលទទួលខុសត្រូវអនុវត្តកំណែទម្រង់យ៉ាងសកម្ម បានធ្វើឱ្យពួកគេអន់ខ្សោយ ដោយហេតុនេះ ការកាប់ឈើខុសច្បាប់បានបន្តក្នុងទម្រង់ផ្សេងៗជាច្រើន :

*លិខិតអនុញ្ញាត*

នៅក្នុងលទ្ធផលពីការចាត់វិធានការណ៍បំបាត់ និងការបង្អាក់ប្រតិបត្តិការសម្បទានកាប់ឈើ ការចេញនូវលិខិតអនុញ្ញាត និងអាជ្ញាប័ណ្ណ ដែលលិខិតអនុញ្ញាត និងអាជ្ញាប័ណ្ណទាំងនេះ មានលក្ខណៈខុសច្បាប់ ឬត្រូវបានរៀបចំឡើង ដើម្បីផ្តល់ការបិទបាំងដល់សកម្មភាពខុសច្បាប់ មានការកើនឡើង និងប្លែកៗពីគ្នា ។ ទាំងនេះ រួមមានលិខិតអនុញ្ញាតឱ្យប្រមូល "ឈើចាស់ៗ" - ដែលជាការអនុវត្តត្រូវបានហាមប្រាមដោយ ហ៊ុន សែន ក្នុងឆ្នាំ ១៩៩៩ ដោយសារតែការប្រើប្រាស់យ៉ាងទូលំទូលាយរបស់ខ្លួនជាការបិទបាំងប្រតិបត្តិការកាប់ឈើខុសច្បាប់ ។ ការផ្លាស់ប្តូរដោយការច្នៃប្រឌិតទៅលើទិដ្ឋភាពប្រមូល "ឈើចាស់ៗ" ក៏បានកើតឡើងផងដែរដែលគួរឱ្យកត់សំគាល់ គឺអាជ្ញាប័ណ្ណប្រមូលសំគាល់ឈើ មែកឈើ និងឈើវែង ការអនុញ្ញាតឱ្យកាប់ឈើសម្រាប់ទុកប្រណាំង និងលិខិតអនុញ្ញាតសាងសង់បន្ទាយឈើសម្រាប់កងវរៈសេនាធំឆ័ត្រយោង ដើម្បីលោត[២៧] ។

ឡានដឹកឈើធំៗ របស់ក្រុមហ៊ុនកាប់ឈើ ខែ មីនា ឆ្នាំ ២00៦

លិខិតអនុញ្ញាតដែលអនុញ្ញាតឱ្យកងវរសេនាធំឆ័ត្រយោងកាប់ឈើ

*ការចាំរើសឈើ*

ការចេញលិខិតអនុញ្ញាតឆ្មៀតឱកាស បានរួមជាមួយផែនការសម្របសម្រួលការកាប់ឈើដែលមានមហិច្ឆតាកាន់តែខ្លាំងឡើង ។ ច្រើនបំផុតក្នុងចំណោមនេះ គឺការកាប់ឈើក្នុងឈ្មោះនៃការអភិវឌ្ឍន៍ដាំដើមឈើ ភាពឱនលំទោននៃគម្រោងអភិវឌ្ឍន៍ដឹកនាំដោយរដ្ឋាភិបាល ឬសម្បទានដីសេដ្ឋកិច្ច (ELCs) ។ តាមរយៈគ្រោងការណ៍ទាំងនេះ មន្ត្រីបានផ្តល់ដីឱ្យមហាសេដ្ឋី ដែលគាំទ្រគណបក្សប្រជាជនកម្ពុជា ដែលមានព្រៃឈើមានតម្លៃ ។ បន្ទាប់មកព្រៃឈើត្រូវបានកាប់រំលំដោយយកឈ្មោះថាធ្វើផ្លូវដាំដើមឈើ ហើយឈើត្រូវបានចម្រាញ់និងលក់ ។ ស្ថានភាពនៃសម្បទានដីសេដ្ឋកិច្ចទៅលើព្រៃឈើល្មើសទៅនឹងច្បាប់ភូមិបាលឆ្នាំ ២00១ របស់ប្រទេសកម្ពុជា ដែលចាត់ព្រៃឈើជា *ទ្រព្យសម្បត្តិសាធារណៈរបស់រដ្ឋ* ហើយអនុញ្ញាតឱ្យមានសម្បទានដីសេដ្ឋកិច្ចតែចំពោះ *ទ្រព្យសម្បត្តិឯកជនរបស់រដ្ឋ*ប៉ុណ្ណោះ ។សម្បទានដីសេដ្ឋកិច្ចជាច្រើនលើសពីកម្រិតកំណត់ ១0,000ហា របស់ច្បាប់ ។ ប្រសិនបើមិនមែនទាំងអស់ទេ ភាគច្រើនបំផុត អ្នកកាន់កាប់សម្បទានដីសេដ្ឋកិច្ច មិនបានបំពេញតាមតម្រូវការច្បាប់ ដើម្បីធ្វើការវាយតម្លៃផលប៉ះពាល់បរិស្ថានឡើយ ។

ប្រតិបត្តិការកាប់សំអាត ដែលចង្អុលបង្ហាញពី "ការអភិវឌ្ឍន៍ដាំដើមឈើ" ធ្វើឱ្យមានការបំផ្លាញចោលទាំងស្រុងនូវព្រៃឈើ ។ ការបំផ្លាញនេះ គឺហៀបបាត់បង់អស់ទៅហើយ ។ជំពូក ៤ រៀបរាប់បង្ហាញពីករណីអភិវឌ្ឍន៍ដាំដើមឈើ ដែលកំពុងត្រូវបានប្រើប្រាស់ជាលេសសម្រាប់ការកាប់ឈើទ្រង់ទ្រាយឧស្សាហកម្មថ្មីក្នុងព្រៃឡង់ ដែលជាព្រៃបៃតងទំនាបធំបំផុតក្នុងអាស៊ីអាគ្នេយ៍ដីគោក ។

*ការកាប់ឈើរបស់យោធា*

ពេលដែលលិខិតអនុញ្ញាត និងផែនការដាំដើមឈើ ផ្តល់ឱ្យការកាប់ឈើនូវភាពរលូននៃការិយាល័យធិបតេយ្យ កងយោធពលខេមរភូមិន្ទ បានរក្សាការបំផ្លិចបំផ្លាញព្រៃឈើរបស់ប្រទេស ដែលមិនធ្វើ សូម្បីតែធ្វើឱ្យមានលក្ខណៈស្របច្បាប់ ។ អង្គភាពកងយោធពលខេមរភូមិន្ទជាច្រើនមានទីតាំងនៅក្នុង ឬជុំវិញព្រៃឈើ ហើយធ្វើប្រតិបត្តិការកាប់ឈើខុសច្បាប់ ដែលរៀបចំឆ្ពោះទៅកាន់ការបង្កើនទ្រព្យសម្បត្តិរបស់មេបញ្ជាការពួកគេ ។

តនៅលេខក្រោយ

តមកពីទំព័រទី ១

# ឥទ្ធិពលនៅកម្ពុជាបន្ទាប់រជ្ជកាល...

បាត់បង់ព្រះជន្មរបស់ព្រះអង្គត្រូវបដណ្តប់ដោយពិធីការណ៍តម្កល់ និងបូជាសពដ៏អធិកអធមបំផុតក្តី ក៏មានប្រជាពលរដ្ឋខ្មែរបញ្ចេញមតិផ្ទុយគ្នាស្រឡាញ់ និងស្អប់ស្មើគ្នាប្រកបដោយភាពអត់ឱននិងថ្លៃថ្នូរគួរឱ្យចង់តាមដាន... ប៉ុន្តែទាំងអស់គ្នានៅបារម្ភយ៉ាងខ្លាំងចំពោះវាសនាអនាគតនៃនាវាកម្ពុជា ដែលគេមើលឃើញថា កំពុងស្ថិតនៅក្នុងចរន្តអាក្រក់នៃអំណាចបរទេសគ្មានអំណាចបដិបក្ខអាចនឹងរំលាយកម្ពុជាជាបញ្ចប់បាន ។

នៅលើទឹកនៃភាពទុក្ខព្រួយដែលគេឃើញចុងក្រោយបង្អស់ ក្រៅពីពលរដ្ឋខ្មែរដ៏ច្រើនមហិមាមកសំដែងការទុក្ខសោកនិងយំស្រែកយំស្រែក គឺនៅមានសម្តេចម៉ែ មុនីនាថសីហនុ និងបច្ចុប្បន្នព្រះមហាក្សត្រ សីហមុនី ដែលមានទឹកមុខទុក្ខព្រួយជាងគេ ពីព្រោះត្រូវរែកអំរែកទាំងអស់នៃការងារមិនទាន់ចប់របស់សម្តេច សីហនុ និងធ្លាក់មកស្មានៃព្រះអង្គទាំងពីរត្រូវរែកចៀសមិនរួច ។

**ទម្ងន់នៃរាជវាំង :** ព្រះបិតា និងព្រះមាតានៃបច្ចុប្បន្នព្រះមហាក្សត្របានខិតខំរៀបចំបញ្ចុះបញ្ចូលក្រុមប្រឹក្សារាជបល្ល័ង្កយ៉ាងប្រឹងប្រែងដើម្បីឱ្យព្រះរាជបុត្រនរោត្តម សីហមុនី អាចឡើងគ្រងរាជបាន ដោយសារក្រុមប្រឹក្សារាជបល្ល័ង្កលើកនេះ ពុំមែននៅក្នុងកណ្តាប់ដៃនៃឥទ្ធិពលព្រះរាជវង្សដូចពេលមុនទេ ។ ព្រះអង្គទាំងពីរដឹងច្បាស់ថា



រាស្ត្រកម្ពុជាពុំទាន់អាចរស់ដោយគ្មានស្តេចបានឡើយទេ ពីព្រោះតែឥទ្ធិពលនៃទំនៀមទំលាប់រាប់ពាន់ឆ្នាំនៃការគ្រប់គ្រងជារាជាណាចក្រ ... តែព្រះអង្គក៏ដឹងដែរថា នៅពេលអាណានិគមបារាំងបញ្ជូនកូនរាស្ត្រខ្មែរឱ្យទៅរៀនសូត្រជ្រៅជ្រះទាំងប្រុសទាំងស្រី គឺនឹងប្តូរការគ្រប់គ្រងប្រទេសពីអំណាចផ្តាច់ការទៅរកការរំលែកអំណាចទៅឱ្យរាស្ត្រកាន់តែច្រើនទៅហើយ ទោះជាព្រះអង្គទាំងពីរមិនចង់បានក៏ដោយក្តី ។ ការផ្លាស់ប្តូរនេះនាំឱ្យឥទ្ធិពលនៃព្រះបរមរាជវាំងធ្វើបានល្អប្រសើរនាចន្លោះឆ្នាំ១៩៤០ ដល់១៩៧០ ដោយសារឥទ្ធិពលនៃចរន្តនយោបាយប្លុកខាងលិចដែលនិយមអំណាចរបស់រាស្ត្រ... តែឆ្នាំ១៩៧០ ព្រះអង្គនៅតែយកឥទ្ធិពលនៃព្រះបរមរាជវាំងទៅប្រើប្រាស់ក្នុងរង្វង់អំណាចនៃប្លុកកុម្មុយនីស្តដែលបានទុកឱ្យព្រះអង្គមានសេរីភាពបំរើរាស្ត្រព្រះអង្គយ៉ាងឯករាជ្យដូចពេលមុនទេ ម្ល៉ោះហើយព្រះបិតាឯករាជ្យជាតិខ្មែរបានហោះហើរពីដៃខ្មែរក្រហមមួយទៅជួយយកអាសារខ្មែរក្រហមទៀត ពីព្រះ-រាជដំណាក់នៃប្រទេសចិន និងកូរ៉េ ដែលព្រះអង្គឧទ្ទិសនាមថា "ព្រះបរមរាជវាំងថ្មី" របស់ព្រះអង្គនោះ ពីព្រោះព្រះអង្គនៅតែជឿថា រាស្ត្រខ្មែរនិងបានសុខនៅក្នុងរង្វង់គ្រប់គ្រងផ្តាច់ការនិយមកុម្មុយនីស្តដដែលតាំងតែពីព្រះអង្គបានជួបលោកនាយករដ្ឋមន្ត្រីចិនកុម្មុយនីស្ត ជូអេនឡាយ ជាលើកទី១ នាឆ្នាំ១៩៦០ នៅបាងឌុងនោះមក ។ ព្រះបិតាឯករាជ្យជាតិនៅប្រថាប់លើរាជបល្ល័ង្កពីឆ្នាំ១៩៤១ ជារៀងរហូតមិនដែលឃ្លាតឆ្ងាយពី "សាំបូល" នៃព្រះរាជវាំងទេ ទោះជាព្រះអង្គលាចាកនយោបាយក៏ដោយ ពីព្រោះ "សាំបូល" នេះរាស្ត្រខ្មែរគោរពខ្លាំងណាស់ ទោះជាបានរៀនចេះដឹងខ្ពស់យ៉ាងណាក៏ដោយ ។ តើព្រះមហាក្សត្រ សីហមុនី និងព្រះមាតា មុនីនាថ និងបន្តទទួលមរតកអតីតព្រះមហាក្សត្រ សីហនុ របៀបណា?

**ទម្ងន់នៃនយោបាយខ្មែរ :** តាំងពីសតវត្សទី១៥មកគេពុំដែលឮថា ស្តេចសម្លាប់ ឬដាក់ទោសរាស្ត្ររបៀបណានោះទេ ដោយសារពុំមានអ្នកកត់ត្រាប្រវត្តិសាស្ត្រត្រឹមត្រូវទៀតទេ គេឮតែស្តេចឈ្លោះគ្នាដណ្តើមរាជបល្ល័ង្កបារាំងសម្លាប់អ្នកតស៊ូ ឬយួនយកក្បាលខ្មែរដាំ "តាយអុង"... ។ល។ ឯកសារនិយាយពីអ្នកតស៊ូ ឬអ្នកនយោបាយពុំមានពីមុនមកទេ... តែតាំងពីដើមសតវត្សទី២០ការចងចាំរបស់ពលរដ្ឋមានច្រើនជាងមុន ។ គេនៅចាំពីបារាំងឱ្យព្រះបរមរាជវាំងផ្តើមជ្រើសរើសមនុស្សពូកែ - មនុស្សក្លាហាន -មនុស្សល្អស្អាត-កំពូលមនុស្សមកឱ្យបំរើកិច្ចការរាជការជុំវិញស្តេចផែនដី ក្រៅពីបងប្អូនមិត្តភ័ក្តិខ្លួនឯង និងមន្ត្រីធំជាដើម... គេនៅចាំពីការឱ្យបង្កើតច្បាប់សម្រាប់គ្រប់គ្រងវាំងនិងប្រទេសជាតិ... គេនៅចាំពីការកែទម្រង់អំណាចស្តេចពី "ព្រះករុណាជីវិតតម្កល់លើត្បូងមកជាព្រះមហាក្សត្រអាស្រ័យរដ្ឋធម្មនុញ្ញ" ។ល។ ទាំងនោះបានធ្វើឱ្យមានមនុស្សហ៊ានចេញមុខមកធ្វើជាអ្នកនយោបាយចូលរួមការគ្រប់គ្រងប្រទេសកាន់តែច្រើន ទោះជាត្រូវប្រឆាំង និងមតិអ្នកកាន់អំណាចក្តី ។ ពាក្យថា ស្តេចជា "អ្នកសម្រេច" រាជរដ្ឋាភិបាលជា "អ្នកគ្រប់គ្រង" គឺជាវិធីដែលប្រទេសរាជានិយមជាច្រើនអនុវត្តន៍ប្រកបដោយជោគជ័យច្រើនសតវត្សមកហើយ គិតតាំងពីជំនាន់ប្រទេស "ក្រិក" ឬ "រ៉ូម៉ាំង" ឬ "អេជីព" **តទៅទំព័រទី១៨**

# រូបមន្តស្តាររាងរៅ ក្រោយពេលសម្រាលកូនរួច

ស្ត្រីទើបនឹងឆ្លងទន្លេរួចភាគច្រើនៗកើតមានកង្វល់ទៅនឹងទម្ងន់ខ្លួនកើនឡើងខុសធម្មតាក្នុងអំឡុងពេលពពោះ ។ ប៉ុន្តែពេលនេះសង្ឃឹមថា អ្នកនឹងអស់កង្វល់ក្នុងរឿងនេះ ព្រោះរូបមន្តខាងក្រោមនេះនឹងជួយឱ្យអ្នកមានរាងកាយស្រស់ស្អាតដូចដើមវិញ ឬយ៉ាងហោចណាស់ក៏បានល្អប្រសើរជាងមុនដែរ ។

១.ទទួលទានទឹកក្នុងមួយថ្ងៃទី ១០-១២ កែវ កាត់បន្ថយភេសជ្ជៈមានជាតិស្ករស្ងួត ឬស៊ុប្បទឹកផ្លែឈើរួចងាកមកទទួលទានទឹកស្អាតលាយទឹកក្រូចឆ្មារបន្តិចបន្តួចជំនួសវិញ ។

២.ជ្រើសរើសនំស្រួយដើម្បីសុខភាពដូចជា នំប័ន្ធខន ក្រេកឃ័-ហូលវីក ឬសណ្តែកបំពងតែហាមប៉ះពាល់នំស្រួយដែលសម្បូរជាតិម្សៅ និងខ្លាញ់ ។

៣.បរិភោគសាច់មិនជាប់ខ្លាញ់ជ្រើសរើសសាច់មាន់មិនជាប់ស្បែក សាច់គោ និងសាច់ជ្រូកគួរជ្រើសរើសយកប្រភេទសាច់ខ្ទងគ្មានខ្លាញ់ផងដែរ ។

៤.ទទួលទានអាហារធញ្ញជាតិដូចជា : នំប៉័ងផាស្តា និងស៊ីរៀលពណ៌ត្នោតតែប៉ុណ្ណោះ ។

៥.ហាមលង់ជឿលើឃោសនាដែលអះអាងថា NOT FAT ព្រោះការពិតអាចពោរពេញទៅដោយ កាល់ស្យូមពីប្រេងបន្លែ ឬទឹកស្ករ ។ មធ្យោបាយដែល គួរអានស្លាកប្រាប់ពីសារធាតុអាហារឱ្យច្បាស់ទើបល្អជាង ។

៦.ព្យាយាមជៀសឱ្យផុតពីប្រភេទហ្វាសហ្វូត ឬបើពេលអាហារណាមួយត្រូវប្រឈមនឹងហ្វាសហ្វូត គួរកុម្ម៉ង់មានបន្លែហាមកុម្ម៉ង់ប៊ឺហ្គ័រ ។

៧.ក្រោយពេលមានអារម្មណ៍ថា មានលក្ខណៈសម្បត្តិគ្រប់គ្រាន់ហើយចាប់ផ្តើមហាត់ប្រាណស្រាលៗដោយផ្តើមពីការដើរលេងជាមួយកូនក្នុងមួយថ្ងៃ១០នាទី ដោយប្រើឧបករណ៍រាប់នឹងសន្សឹមបង្កើនថេរៈវេលាដល់២០នាទី ។

៨.រិះរកវិធីងាយៗដើម្បីហាត់ប្រាណបានកាន់តែច្រើន ដូចជារកទីតាំងចតរថយន្តឱ្យកាន់តែឆ្ងាយទៅ ឬអាចប្រើវិធីដើរឡើងជណ្តើរជំនួសការប្រើជណ្តើរយន្ត ។

៩.បំបៅដោះកូន ដើម្បីជួយបំលែងជាតិខ្លាញ់ ។ ការបំបៅដោះដោយខ្លួនឯងក្រៅពីជួយឱ្យកូនបានធំធាត់ល្អទាំងរាងកាយ និងការវិវឌ្ឍន៍ខាងផ្នែកស្មារតីប្រាជ្ញាតាមរយៈទឹកដោះម្តាយហើយនោះ នៅមានផលល្អសម្រាប់ម្តាយផងដែរ ព្រោះវាជួយបំលែងបានរហូតដល់៥០០កាល់ស្យូម រឺឯណោះ ។ មានន័យថា ប្រសិនបើអ្នកបំបៅកូនកាន់តែច្រើនការបំលែងក៏បានច្រើនទៅតាមនោះដែរ ។

១០.ចូលក្លឹបហាត់ប្រាណ ប្រសិនបើអ្នកគិតថា មិនចិញ្ចឹមកូនដោយខ្លួនឯងសាកល្បងស្វែងរកអ្នកមើលថែទាំកូនជំនួស២.៣ម៉ោង ហើយអ្នកចូលក្លឹបហាត់ប្រាណដើម្បីសុខភាព ។

១១.មួយវិញទៀតអ្នកកុំភ្លេចថា ខ្លួនឯងបានសន្សំទម្ងន់ខ្លួននេះអស់៩ខែមកហើយ ដូច្នេះការសម្រកវាឱ្យវិលទៅរកស្ថានភាពដើមនោះមិនមែនជារឿងធ្វើបានងាយៗនោះទេ ៕




# សម្ផស្សស្រស់ស្អាតក្នុងពេលដ៏ខ្លី



○ប្រសិនបើអ្នកចង់បានសម្ផស្សស្រស់ស្អាត តែមិនសូវមានពេលវេលានោះខាងក្រោមនេះជាចម្លើយងាយៗដែលអ្នកកំពុងរង់ចាំជា ពិសេសអ្នកអាចរកវាបានដោយងាយមាននៅក្នុងផ្ទះបាយនោះឯង ។

-**ផ្លាប់សក់** : ប្រសិនបើនៅក្នុងទូទឹកកករបស់អ្នកមានផ្លែអារ៉ូកាដូដែលកំពុងតែទុំដោយល្អនោះអ្នកអាចនាំវាមកផ្លាប់សក់ឱ្យឡើងរលើបរលោងបានដោយប្រើ ស្លាបព្រាកោសរួចយកសាច់ដែលកោសបានមកលាបលើសក់ក្បាលឱ្យសព្វ ។

-**មើលថៃស្បែកគល់ក្រចក** : ប្រសិនបើនៅក្នុងផ្ទះអ្នកមានក្រូចឆ្មារ ឬក្រូចនោះអ្នកអាចនាំយកវាមកព្យាបាលស្បែកគល់ក្រចកដែលកំពុងមានសភាពក្រៀមរីងបានដោយពុះផ្លែក្រូចឆ្មារ ឬផ្លែក្រូចមួយចំណិតយកមកជូតត្រដុសលើសាច់ក្រចក ឬអាចដុសពេញ១ដុំតែម្តងក៏បានដែរ ។

-**ស្រស់ស្អាតគ្មានក្លិន** : នៅពេលណាមួយរ៉ូលអនរបស់អ្នកអស់ដោយចៃដន្យអ្នកអាចដើរចូលទៅក្នុងផ្ទះបានរួចយកម្សៅបើកកិនសូដា (ម្សៅមេដ) មកប្រើជំនួសបាន ។ ម្សៅបើកគិនសូដានេះក្រៅពីជួយរម្ងាប់ក្លិនបានដោយប្រសិទ្ធភាពហើយនោះនៅជួយស្រូបយកក្លិននៅក្នុងក្លៀកធ្វើឱ្យស្ងួតទៀតផង ៕

តមកពីទំព័រទី ៩

## កិច្ចសម្ភាសន៍ពិស្តាររវាង"ខ្មែរផូស"ជាមួយ...

ប្រទេសកម្ពុជា គឺជាកាតព្វកិច្ចនៃយើងទាំងអស់គ្នា ដែលស្នេហាលទ្ធិ ប្រជាធិបតេយ្យ ហើយរដ្ឋាភិបាលនៃសហរដ្ឋអាមេរិក ក៏មានកាតព្វកិច្ចក្នុងតួនាទីខ្លួនជាសមាជិកនៃកិច្ចព្រមព្រៀងទីក្រុងប៉ារីស ក៏ដូចជាតួនាទីជាអ្នកផ្តល់ជំនួយដ៏សំខាន់ដល់ប្រទេសកម្ពុជាយើង ។ ហើយសហរដ្ឋអាមេរិកជាប្រទេសមួយដែលជំហរយ៉ាងខ្លាំងក្លាលើប្រព័ន្ធសិទ្ធិមនុស្ស និងលទ្ធិប្រជាធិបតេយ្យ ដូច្នោះយើងបានជួបជាមួយមន្ត្រីរបស់សហរដ្ឋអាមេរិក ដោយបានជម្រាបថា: ការបោះឆ្នោតដោយសេរី និងយុត្តិធមិ គឺចាប់ផ្តើមពីឱ្យមានគណកម្មការជាតិរៀបចំការបោះឆ្នោតដែលឯករាជ្យ ។ លើសពីនេះទៀតគឺការចូលរួមពីប្រធានគណបក្សប្រឆាំងដ៏ធំនៅប្រទេសកម្ពុជា គឺជាការចាំបាច់ ។ យើងក៏បានដាក់សំនួរទៅកាន់សហរដ្ឋអាមេរិក ក៏ដូចជារដ្ឋាភិបាលនៃសហគមន៍អឺរ៉ុប និងម្ចាស់ជំនួយដ៏ទៃទៀត ថាតើការបោះឆ្នោត នាឆ្នាំ២០១៣ ខាងមុខនេះជារដ្ឋាភិបាលដែលកើតចេញពីការលួចបន្លំសន្លឹកឆ្នោត ឬមួយក៏កើតចេញពីការបន្លំសម្លេងគាំទ្រគណបក្សប្រឆាំង ដូច្នេះគួរតែរដ្ឋាភិបាលសហរដ្ឋអាមេរិកពិចារណាឱ្យបានមែនទែន ជាពិសេសទស្សនៈកិច្ចរបស់លោក អូបាម៉ា ទៅកាន់ប្រទេសកម្ពុជា សូមឱ្យមានការដាក់លក្ខខណ្ឌប្រជាធិបតេយ្យសិទ្ធិមនុស្ស ហើយការបោះឆ្នោតដោយសេរី និងយុត្តិធមិ ។ ដូច្នេះការអញ្ជើញ វិលចូលស្រុកវិញ របស់លោកប្រធាន សម រង្ស៊ី ពិតជាមានដោយសារតែខ្ញុំមានជំនឿថា អនាគតរដ្ឋាភិបាលនៃប្រទេសកម្ពុជាយើង ជាពិសេស លោក ហ៊ុន សែន ក៏គិតដែរថាតើគាត់អាចកាន់រដ្ឋាភិបាលមួយដែល ចេញពីការលួចបំបាត់សន្លឹកឆ្នោតបាន ឬទេ? អ៊ីចឹងការអភិវឌ្ឍន៍នៃប្រទេសកម្ពុជាយើងត្រូវតែជាការអភិវឌ្ឍន៍មួយនៅលើអ្នកដឹកនាំដែល ប្រកាន់នូវលទ្ធិប្រជាធិបតេយ្យ ។ ដូច្នេះការចូលរួមរបស់លោកប្រធាន សម រង្ស៊ី ជាការចាំបាច់ណាស់ ។

**អ៊ុម លឿម :** ក្នុងនាមលោកជំទាវជាអ្នកនយោបាយដែលបានយល់ដឹងយ៉ាងទូលំទូលាយអំពីទិដ្ឋភាពទូទៅនៃស្ថានការណ៍កម្ពុជា ជាពិសេសលោកជំទាវតែងតែអះអាងខ្លួនថា ជាអ្នកប្រជាធិបតេយ្យ ដូច្នេះតើលោកជំទាវអាចពិពណ៌នាអំពីស្ថានការណ៍នយោបាយកម្ពុជា ក៏ដូចជាដំណើរការប្រជាធិបតេយ្យនៅឯប្រទេសកម្ពុជានាពេលបច្ចុប្បន្នថាមានការបោះជំហានទៅមុខ ឬមានការថយក្រោយយ៉ាងណាដែរ ឬទេ? ។

**មួរ សុខហួ :** ទៅមុខខ្ញុំមិនឃើញទេ យើងនៅតែឃើញមានការ ចាប់ចងប្រជាពលរដ្ឋតាមរយៈយកប្រព័ន្ធតុលាការដែលជាឧបករណ៍ នយោបាយនៃគណបក្សកាន់អំណាច ។ ទៅមុខមិនកើតទេដោយសារតែប្រជាពលរដ្ឋយើងនៅតែបាត់បង់ដីធ្លីរបស់ខ្លួន ។ ដូច្នេះការអភិវឌ្ឍន៍ មិនអាចទៅមុខទេបើសិនជាប្រជាពលរដ្ឋលោកកំពុងតែភ័យព្រួយមិនហ៊ានបញ្ចេញ ព្រោះដោយសារស្ថាប័នកំពូលៗដូចជាស្ថាប័នប៉ូលិស យោធា តុលាការ ស្ថិតនៅក្នុងការដឹកនាំនៃអ្នកកាន់អំណាច ដូចនេះ យើងត្រូវតែសង្គ្រោះការអភិវឌ្ឍន៍បែបនេះ ដោយយើងនឹងរៀបចំស្ថានប័ននានា ពិតជាស្ថានប័នរបស់ជាតិយើងត្រូវតែលើកតម្កើង និងអភិរក្សនូវធនធានធម្មជាតិ. ធនធានមនុស្ស និងលើកតម្កើងដោយ យើងបង្កើតឱ្យមានមធ្យោបាយដល់មន្ត្រីរាជការរបស់យើង ។ យើងដាក់គម្រោងរួចហើយចំពោះមន្ត្រីរាជការនៅពេលគណបក្សសង្គ្រោះ ជាតិឈ្នះឆ្នោតយើងនិងទទួលប្រាក់បៀវត្ស២៥០ដុល្លារ ស្មើនឹងមួយលានរៀល.ការអប់រំដោយភាពស្មើគ្នា.មានឱកាសស្មើគ្នា.និងទៅពេទ្យដោយមិនយកលុយ.ហើយប្រាក់ខែគោល ចំពោះកម្មករ គឺ១ខែ១៥០ដុល្លារ ដូច្នេះយើងដោយសមរម្យនិងធ្វើការងារដោយមានតម្លៃ។

**អ៊ុម លឿម:** ជាការពិតណាស់ដែលថាបច្ចុប្បន្នគណបក្សប្រជាជនកម្ពុជា ជាគណបក្សមួយដែលរក្សាអំណាចរបស់ខ្លួនបានយ៉ាងមាំបំផុត. ដូច្នេះរាល់អ្វីៗទាំងគឺស្ថិតនៅលើការគ្រប់គ្រងរបស់គណបក្សប្រជាជនកម្ពុជាទាំងអស់.ឧទាហរណ៍ ដូចជាប្រព័ន្ធផ្សព្វផ្សាយក្នុង ស្រុក និងគណៈកម្មការជាតិរៀបចំការបោះឆ្នោត(គ.ជ.ប) ដែលជាស្ថាប័នឯករាជ្យ.អព្យាក្រឹត្យនោះ ប៉ុន្តែផ្ទុយទៅវិញស្ថាប័ន គឺមានទំនោរទៅខាងគណបក្សកាន់អំណាចរួចជាស្រេចទៅហើយ.ដូច្នេះ ក្នុងនៃនេះទោះបីជាគណបក្សសង្គ្រោះជាតិមានសន្ទុះនៃការគាំទ្រយ៉ាងខ្លាំងពីសំណាក់ប្រជាពលរដ្ឋគ្រប់ច្រកល្ហកយ៉ាងណាក៏ដោយចុះក៏វាសនាគណបក្សប្រឆាំងស្ថិតនៅលើគណបក្សប្រជាជនដែលកំពុងក្តាប់អំណាចជាអ្នកគូសវាសឱ្យ.ដូច្នេះតើលោកជំទាវមានសុទិដ្ឋិនិយមយ៉ាងណាចំពោះជោគជ័យនៃគណបក្សសង្គ្រោះជាតិក្នុងការចូលរួមប្រកួតប្រជែងបោះឆ្នោតថ្នាក់ជាតិនាខែកក្កដាឆ្នាំ២០១៣ខាងមុខនេះបាន? ។

**មួរ សុខហួ :** យើងខ្ញុំជឿជាក់ណាស់ថាមន្ត្រីរាជការដែលចំនួន២ម៉ឺនហ្នឹង.គឺចំនួនដ៏ធំណាស់ដែលអស់លោកទាំងហ្នឹងចង់បំរើប្រទេសជាតិ. លោកពុំមែនជាសមាជិកគណបក្សប្រជាជនទេ. ប៉ុន្តែ គេបង្ខំឱ្យលោកចុះហត្ថលេខាឱ្យធ្វើជាសមាជិកនៃគណបក្សប្រជាជនកម្ពុជា។ មន្ត្រីរាជការរបស់យើងលោកចង់បំរើប្រទេសជាតិ. ដូចជាលោកគ្រូអ្នកគ្រូលោកចង់ឱ្យកូនចៅយើងមានការអប់រំដោយមានគុណភាព ដើម្បីមានអនាគតសំរាប់កូនចៅរបស់យើង ។ នៅពេលណាដែលមន្ត្រីរាជការរបស់យើងអាចទទួលប្រាក់បៀវត្សរស់ដោយសមរម្យ ហើយមានការធានានូវសេវាទូទៅនោះ.ខ្ញុំជឿជាក់ថា តម្លៃទាំងប៉ុន្មាននេះធ្វើឱ្យមន្ត្រីរាជការរបស់យើងលោកពិចារណា ហើយ

តទៅទំព័រទី ១៣

តមកពីទំព័រទី ១២

# កិច្ចសម្ភាសន៍ពិស្តាររវាង"ខ្មែរ...

លោកនឹងចូលរួមជាគណបក្សសង្គ្រោះជាតិ។ សំខាន់ទៀត នោះយើងចង់សួរថា ប្រទេសភូមាដែលជាប្រទេសកាន់អំណាចផ្តាច់ការជាង៤៥ឆ្នាំ, ឥឡូវគេងាកមកហើយ,យើងឃើញថាប្រទេសណា ដែលជាប្រទេសផ្តាច់ការ,ប្រទេសកុម្មុយនីស្តមិនអាចរស់នៅបន្តទៅទៀតទេ, ពីព្រោះការអភិវឌ្ឍន៍ នៅសកលលោកសព្វថ្ងៃនេះ គឺយកលទ្ធិប្រជាធិតេយ្យជាធំ...។ អ៊ីចឹងយើងកុំទាន់អស់សង្ឃឹម ,យើង នៅមានសង្ឃឹមជានិច្ច។ អ្វីដែលយើងត្រូវធ្វើក្នុងរយៈពេល៩ខែខាងមុខនេះ គឺយើងយកព័ត៌មានយកទៅបង្ហាញប្រជាពលរដ្ឋយើងកុំឱ្យមានការភិតភ័យ,យើងបង្កើនឱ្យមានសំឡេងប្រជាពលរដ្ឋរបស់យើង,បង្កើនឱ្យមានការជួបជុំ,បង្កើនឱ្យមានវេទិការសាធារណៈ ដើម្បីបង្ហាញដល់ប្រជាពលរដ្ឋរបស់យើងថា យើងមិនខ្លាចទេ ,ពេលណាយើងខ្លាចខ្មោច,ខ្មោចនឹងលងយើងហើយ,យើងត្រូវ តែយកលទ្ធិប្រជាធិបតេយ្យជាមាគ៌ា, ធ្វើជាការ បង្ហាញ,ធ្វើជាក្តីសង្ឃឹមទើបយើងអាចផ្លាស់ប្តូរ, ហើយការផ្លាស់ប្តូរ គឺយើងផ្តល់អំណាចឱ្យប្រជាពលរដ្ឋលោកយល់នៃតម្លៃស-ន្លឹកឆ្នោតរបស់លោក ។

យើងគិតអំពីរឿងដីធ្លីប្រជាពលរដ្ឋរបស់យើង,យើងសើររើអ្វីដែលប៉ះពាល់ប្រយោជន៍ជាតិយើង។ អ្វីដែលប៉ពាល់ទៅដល់ផលប្រយោជន៍នៃប្រជាកសិករខ្មែរ, ពីព្រោះ៨៥ភាគរយនៃប្រជាពលរដ្ឋរបស់យើងជាប្រជាកសិករ។ យើងដឹងហើយថាដីធ្លីដែលសម្តេចនាយករដ្ឋមន្ត្រី ហ៊ុន សែន ចុះហត្ថលេខាឱ្យទៅក្រុមហ៊ុនឯកជននោះ មានរហូតដល់ទៅជាង២លានហិកតា,ហើយព្រៃឈើជាង១លានហិកតា ដែលចុះហត្ថលេខាទៅឱ្យក្រុមហ៊ុនទាំងអស់នោះ ត្រូវតែសើររើឡើងវិញ ។ អ្វីដែលជាបញ្ហាព្រំប្រទល់ទឹកដី គឺយើងត្រូវតែសើររើ។ នេះយើងនឹងអាចបោះចោលបានទេ ព្រោះយើងត្រូវចាប់ផ្តើមដោយភ្លាមៗ។ សំខាន់ជាមួយគ្នានេះ យើងសន្យានឹងតំឡើងប្រាក់បៀវត្សរបស់មន្ត្រីរាជការ,ឡើងប្រាក់ខែដល់កម្មកររបស់យើង,សាំងចុះថ្លៃ សេវាអប់រំ,សេវាសុខភាពឥតគិតថ្លៃនេះយើងធ្វើជាបន្ទាប់ឯស្ថាប័នសភា ដែលជាស្ថាប័នកំពូលយើងនឹងគោរពថា ជាស្ថាប័នដែលមានអំណាចគ្រប់គ្រាន់,លោកគ្រូ អ្នកគ្រូ របស់យើងនឹងត្រូវចូលធ្វើការងារដោយមានតម្លៃ យើងរៀបចំស្ថាប័នអប់រំ,យើងរៀបចំសុខាភិបាល,សំខាន់មួយទៀតយើងរៀបចំប្រព័ន្ធយុត្តិធម៌,ប្រព័ន្ធយុត្តិធម៌នេះ សំរាប់ប្រជាពលរដ្ឋយើងមានសភាពធ្ងន់ធ្ងរណាស់, អ្វីដែលអយុត្តិធម៌យើងរើសើរឡើងវិញ ដើម្បីឱ្យប្រជាពលរដ្ឋយើងមានលំនឹង,មានក្តីសង្ឃឹមលើអំណាចនៃរដ្ឋ,ហើយអំណាចនៃរដ្ឋនឹងគឺយើងមកដើម្បីផ្តល់សន្តិសុខជូនប្រជាពលរដ្ឋពិតប្រាកដមិនមែនជាន់ប្រជាពលរដ្ឋដូចសព្វថ្ងៃនេះទេ ។ អន្តោប្រវេសន៍យើងត្រូវតែដោះស្រាយដោយបន្ទាន់ត្រូវយកច្បាប់អន្តោប្រវេសន៍ដែលមានតាំងពីឆ្នាំ១៩៩៤នោះមកអនុវត្តន៍យើងមានឆន្ទៈពិតប្រាកដ,យើងមិនមែនទៅចាប់ចង់,យើងមិនទៅយកទោសប្រើអំពើហិង្សាទៅលើជនអន្តោប្រវេសន៍ខុសច្បាប់ទេ,យើងត្រូវគោរពច្បាប់...។

**អ៊ុម លឿម :** នាពេលថ្មីៗកន្លងទៅនេះ លោក កឹម សុខា ប្រធានគណបក្សសិទ្ធិមនុស្ស និងជាអនុប្រធានគណបក្សសង្គ្រោះធ្លាប់បានអះអាង និងសន្យាថា នឹងយកមកវិញនូវកោះត្រល់ ដែលជាកោះកម្មសិទ្ធិរបស់ខ្មែរ ហើងបច្ចុប្បន្នត្រូវគ្រប់គ្រងដោយយួន,តើលោកជំទាវអ្វីបន្ថែមនូវប្រសាសន៍របស់កឹម សុខា ដែរទេបាទ ?

**មួរ សុខហួរ :**ជាការពិតណាស់កោះត្រល់ក្តី, កម្ពុជាក្រោមក្តី,អ្វីដែលជាទ្រព្យសម្បត្តិដូនតារបស់ទទួលថែរក្សាការពារ ហើយនឹងទាមទារយកមកវិញ តាមច្បាប់អន្តរជាតិ។ យើងមិនអាចនិយាយថា រឿងខ្មែរក្រោម,រឿងកោះត្រល់ជារឿងហួសសម័យ,អ្នកនោះយើងមិនអាចចាត់ទុកថា ជាអ្នកនយោបាយដែលមានឆន្ទៈនៅក្នុងការការពារបូរណភាពទឹកដីយើងទេ,ជំហររបស់យើងច្បាស់ណាស់ អំពីបូរណភាពទឹកដី,យើងនឹងសើររើអ្វីដែលកិច្ចព្រមព្រៀងខុសច្បាប់,ហើយយើងជាអ្នកកាន់រដ្ឋាភិបាលថ្មីនេះ គឺមានឆន្ទៈពិតប្រាកដ,ហើយយើងតស៊ូជិត២០ឆ្នាំនេះ គឺដើម្បីថែរក្សាព្រលឹងជាតិខ្មែរយើង,មរតកនៃកេរ្តិ៍ដូនតារបស់យើង,ហើយសំខាន់បំផុតគឺជាតិខ្មែរពិតជាមិនអាចសាបសូន្យទេ ។ បើសិនជាយើងអត់មានជំហររបៀបនេះទេ,យើងទុករឿងកោះត្រល់,យើងទុកដីធ្លីប្រជាពលរដ្ឋជារឿងមិនសំខាន់ និងយើងទុកប្រទេសកម្ពុជាឱ្យប្រទេសជិតខាងហើយ។ យើងមិនមែនឈ្លោះសំរាប់ឱ្យប្រទេសយើងទៅគេទេ,យើងតស៊ូ,យើងយកជីវិតយើងមកដាក់ដើម្បីតស៊ូនេះ,យើងបង្ហាញច្បាស់ណាស់រឿងទឹកដីជាអាយុជីវិតរបស់ជាតិយើង របស់ប្រជាពលរដ្ឋយើង...។

**អ៊ុម លឿម :** សូមអរគុណលោកជំទាវ ហើយនៅសំណួរចុងក្រោយនេះ, តើលោកជំទាវមានអ្វីផ្តាំផ្ញើដល់ជនរួមជាតិនៅឯក្រៅប្រទេសដែរឬទេបាទ ?។

**មួរ សុខហួ :** ខ្ញុំសូមអរគុណក្នុងនាមលោកប្រធាន សម រង្ស៊ី និងលោក កឹម សុខា និងក្នុងនាមយើងទាំងអស់គ្នាជាសមាជិក សមាជិការ នៃគណបក្សសង្គ្រោះជាតិ,សូមអរគុណដ៏ស្មោះដល់ប្រជាពលរដ្ឋយើងទាំងអស់ដែលរស់នៅឯនាយសមុទ្រ, យើងខ្ញុំតែងតែសួរទៅបងប្អូននៅឯនាយសមុទ្រដែលបានមកចូលរួមក្នុងវេទិការដែលយើងខ្ញុំចុះមកនេះ ។ ខ្ញុំតែងតែសួរថា តើបងប្អូននឹកប្រទេសជាតិទេ ? តើព្រលឹងបងប្អូននៅឯណា? ។ គាត់តែងតែនិយាយថាព្រលឹងរបស់គាត់នៅឯប្រទេសកម្ពុជា។ ភាពកក់ក្តៅដែលខ្ញុំបានទទួលបំផុតនោះគឺនៅគ្រប់ទីកន្លែង។ ផ្ទះដែលខ្ញុំបានទៅនៅជាមួយបងប្អូនយើងនៅឯគ្រប់រដ្ឋដែលយើងបានទៅនោះ គឺផ្ទះណាក៏មានជាអ្វីមរកតនៃខ្មែរយើង, ម្ហូបក៏ទទួលទានម្ហូបខ្មែរយើង,ស្តាប់វិទ្យុខ្មែរ,ហើយនិយាយក៏និយាយជាភាសារខ្មែរ,នឹករលឹកតែពីប្រទេសជាតិយើង,ហើយខ្ញុំសូមអរគុណដល់វិភាគទាន ដែលយើងបានទទួលរហូតទៅដល់ជាង២ម៉ឺនដុល្លារក្នុងរយៈពេលពាសប្តាហ៍នេះ...។

**អ៊ុម លឿម :** សូមអរគុណបាទលោកជំទាវដែលផ្តល់ឱកាសឱ្យបាទសម្ភាសន៍ជាមួយលោកជំទាវហើយសូមជូនពរឱ្យបេសកម្មរបស់លោកជំទាវទទួលបាននូវភាពជោគជ័យ ៕

នាទី ប្រវត្តិសាស្ត្រ

# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**២៤មិនា :** គប់គ្រាប់បែកចូលទីស្នាក់ការកាសែត "អន្តរាគមន៍"មានរបួស៥នាក់

២៧ មិនា ១៩៩៤ រដ្ឋមន្ត្រីការបរទេសខ្មែរ នរោត្តម សិរីវុឌ្ឍប្រកែកតវ៉ាចំពោះអាជ្ញាធរថៃ ដែលបានកៀរជនភៀសខ្លួនខ្មែរ គេចខ្លួនពីការវាយប្រហារគ្នា នៅតំបន់គ្រប់គ្រងដោយខ្មែរក្រហម-ថៃមិនឱ្យខ្មែរចូលការិយាល័យ អ.ស.ប នឹង សិទ្ធិមនុស្សតាំងនៅលើទឹកដីថៃ។

២៩-មិនា ទាហានរដ្ឋាភិបាលបានវាយប្រហារលើគុកបាត់តំបង ដើម្បីរំដោះអ្នកទោសម្នាក់ ដែលជាប់ចោទពីបទរត់ពន្ធវត្ថុបុរាណ។

៩ មេសា លោកគ្ការេត អេវ៉ាន់ ថ្លែងការថា "ក្រុមខ្មែរក្រហមជាទ័ពចុះខ្សោយ"-នៅថ្ងៃដែលខ្មែរក្រហមបានសម្លាប់យួន១២នាក់ ក្នុងនោះមានក្មេងម្នាក់ ហើយធ្វើឱ្យរបួស២៥នាក់ នៅត្រើយស្លា ខេត្តកណ្តាល។

១១ មេសា ជនជាតិអូស្ត្រាលី នឹងអង់គ្លេស បានត្រូវគេលប់ចោលនៅលើផ្លូវទៅកំពង់សោម - រដ្ឋមន្ត្រីអូស្ត្រាលី គ្ការេត អេវ៉ាន់ បានបញ្ជាក់ថ្ងៃ២កញ្ញា ក្រោយមកថា អ្នកទាំងពីរត្រូវគេសម្លាប់។

១៣ មេសា សម្តេចសីហនុ បើកធ្វើ"ប្រជាសវនាការ"ឡើងវិញដូចព្រះអង្គធ្លាប់ធ្វើមុន១៩ភាគ រយ។

១៩ មេសា : ទ័ពខ្មែរក្រហម៣០០០នាក់ ដណ្តើមយកប៉ៃលិនវិញបាន-រដ្ឋាភិបាលខ្មែរចោទថា សៀមបានជួយសម្រួលដល់ក្រុមខ្មែរក្រហម- ការវាយចាញ់នៅអន្លង់វែង នឹងនៅប៉ៃលិន បានបញ្ជាក់ថា ទ័ពរដ្ឋាភិបាលគ្មានសមត្ថភាព គ្មានន័យ នឹងពុករលួយបំផុត។

២២ មេសា : សម្តេច សីហនុ ស្នើឱ្យបើកកិច្ចប្រជុំតុមូល (គំនិតពីខែកក្កដា ១៩៩៣)។

២៨ មេសា : ខ្មែរក្រហមយកត្រែង(ពាក់កណ្តាលផ្លូវបាត់តំបង-ប៉ៃលិន)បាន-យកមូលដ្ឋានយោធាសម្រាប់ រតនមណ្ឌលបានធ្វើឱ្យមានការគម្រាមកំហែងយ៉ាងខ្លាំងដល់បាត់តំបង។

២៩ មេសា : ប្រកាសពីរមណភាពរបស់ឧត្តមសេនីយ សាក់ ស៊ុត សាខន អាយុ ៦៨ ឆ្នាំ ប្រធានគណបក្ស"ប្រជាធិបតេយ្យសេរីព្រះពុទ្ធសាសនា" នឹងជាទីប្រឹក្សាយោធារបស់រដ្ឋាភិបាលលោកបានត្រូវស្លាប់នៅពេលខ្មែរក្រហមយកប៉ៃលិនវិញបាន។

៣០ មេសា : នាឱកាសធម្មយាត្រា"សន្តិភាព សំដៅទៅប៉ៃលិន ដឹកនាំដោយសម្តេចសង្ឃមហាឃោសនន្ទ ព្រះសង្ឃ ១ អង្គនឹងយាយជីម្នាក់បានត្រូវស្លាប់ដោយការបាញ់គ្នារវាងទ័ពរដ្ឋាភិបាល នឹងខ្មែរក្រហម ពួកស្បែកស ៦នាក់ នឹងខ្មែរបីនាក់ បានត្រូវចាប់ខ្លួនដោយខ្មែរក្រហម ហើយលែងមកវិញ នៅប៉ុន្មានម៉ោងក្រោយមក។

២ ឧសភា ១៩៩៤ : កិច្ចប្រជុំតុមូលគ្រោងនឹងធ្វើពីថ្ងៃ២ដល់៧ឧសភា បានត្រូវលប់ចោល ដោយ ខៀវ សំផន មិនព្រមមកភ្នំពេញ ដោយ-ថា គ្មានសន្តិសុខគ្រប់គ្រាន់-ក្រុមខ្មែរក្រហមយកបានមូលដ្ឋានដែលបាត់បង់ពីឆ្នាំ១៩៩៣ មកវិញបាន។

៥ ឧសភា : សីហនុ និយាយពីអំពើសាហាវយង់ឃ្នងរបស់ក្រុមខ្មែរក្រហម លើប្រជាជនស៊ីវិល ។

៥-៦ ឧសភា : ប្រជុំអន្តរជាតិរបស់អង្គការក្រៅរដ្ឋាភិបាលនៅប្រ៊ុចសែល សម្រេចថា សកម្មភាពនៅកម្ពុជារបស់ពួកខ្លួនដែលផ្តើមពី១៩៨៧ត្រូវបញ្ចប់។

៦-៧ ឧសភា : សីហនុ ស្នើឱ្យមានការបោះឆ្នោតសាជាថ្មីដោយឱ្យខ្មែរក្រហមចូលរួម ឬក៏ចរចាឱ្យមានវត្តមានក្រុមខ្មែរក្រហមក្នុងរដ្ឋាភិបាល ដោយមានការកែប្រែរដ្ឋធម្មនុញ្ញបន្ទាប់ពីខ្មែរក្រហមប្រគល់តំបន់ដែលខ្លួនកាន់កាប់ឱ្យមករដ្ឋាភិបាល នឹងរំលាយទ័ពខ្លួនចោលចេញ។

១០ ឧសភា : មានរបាយការណ៍មួយនៅមជ្ឈមណ្ឌលសិទ្ធិមនុស្សនៃ អ.ស.ប បានឱ្យដឹងថា នៅបាត់តំបងមានកងឯកភាពយកការណ៍ កងយោធពលខេមរភូមិន្ទ លេខ៩១ ដឹកនាំដោយសមាជិកគណបក្សប្រជាជនបានប្រព្រឹត្តសកម្មភាពលួចប្លន់-ចាប់រំលោភ-ចាប់ជំរិត-ចាប់ឃុំខ្លួន-ធ្វើបាបនឹង សម្លាប់ចោលរហូតដល់មានស៊ីសាច់មនុស្សថែមទៀត-របាយការណ៍នេះ បានត្រូវបញ្ជាក់បន្ថែម ដោយអង្គការក្រៅរដ្ឋាភិបាលខ្មែរនិងបរទេស។

១០ ឧសភា : រដ្ឋាភិបាលមិនទទួលសំណើរសីហនុ ធ្វើឱ្យព្រះអង្គអស់សង្ឃឹមអស់ជំនឿ ហើយត្រៀមចេញដំណើរទៅប៉េកាំង។

១២ ឧសភា : ក្រុមប៉ូលិសឯកសណ្ឋានហ៊ុនស៊ិនប៊ិច បានចូលលុកការិយាល័យកាសែត "សាកល"ទប់ស្កាត់មិនឱ្យផ្សាយអត្ថបទពីសកម្មភាពរដ្ឋាភិបាលមុនឆ្នាំ១៩៧០-រដ្ឋមន្ត្រីក្រសួងព័ត៌មានគាំទ្រសកម្មភាពនេះ ហើយប្តឹងចាងហ្វាងកាសែតឱ្យឡើងតុលាការពីបទមើលងាយរាជនិយម។

១៣ ឧសភា : យោធារដ្ឋាភិបាលបានទៅអុកឡុកសវនាការតុលាការនៅក្រុងព្រះសីហនុ-វាយចៅក្រមនឹងព្រះរាជអាជ្ញា ហើយគម្រាមថានឹងសម្លាប់ចោល។

១៥ ឧសភា : មានឃាតកម្មលើអ្នកទេសាចវៀតណាម២រូប-កប៉ាល ដឹកសម្ភារៈអ៊ុនតាក់ចុង ក្រោយបានចេញដំណើរ។

(នៅមានត)



# ពុទ្ធប្បវត្តិអមដោយរូបភាព

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.

## អត្ថបទបន្ថែម

## បូជនីយដ្ឋានសេសសល់របស់ព្រះពុទ្ធសាសនាក្នុងប្រទេសឥណ្ឌា

## The Holy Remains of the Buddhist Teaching in India



**៤-អាគារអនុស្សាវរីយ៍នៃមហាក្សត្រីមាយា និងស្រះទឹក**

នៅខាងក្រោយបង្គោលសិលាចារិករបស់ស្តេចអសោក មានអាគារពណ៌មួយដែលជាអាគាររំលឹកអនុស្សាវរីយ៍ដល់ព្រះមហាក្សត្រីមាយា ។ នៅលើផ្ទៃជញ្ជាំងមានគូរគំនូរព្រះពុទ្ធទ្រង់ប្រសូត្រក្នុងចំណោមរឿងផ្សេងៗជាច្រើនទៀត ។ នៅខាងមុខអាគារនេះមានស្រះទឹកធំមួយដែលគេនិយាយថា ទឹកក្នុងស្រះនោះត្រូវបានដងយកទៅលាងជម្រះ និងផ្ងូតព្រះពុទ្ធកុមារនៅពេលព្រះអង្គប្រសូត្រ ។

**៥-ដើមពោធិព្រឹក្ស (ពុទ្ធគយា)**

ពុទ្ធគយាមានចំងាយ៦ម៉ែល៍ (៩.៦៤៨គម) ខាងត្បូងទីក្រុងគយា ។ ព្រះពុទ្ធទ្រង់បានសំរេចការត្រាស់ដឹងពេញបរិបូរណ៍នៅក្រោមដើមពោធិនេះ ។ ទីនេះជាកន្លែងសំខាន់បំផុតសំរាប់ពុទ្ធសាសនិក ដែលតែងតែធ្វើធម្មយាត្រាទៅមិនដាច់ ។ រូបភាព (ដើមពោធិ) នេះមានព័ទ្ធដោយរបងថ្ម និងប្រាសាទ ។

**៦-មហាចេតិយពុទ្ធគយា**

មហាចេតិយពុទ្ធគយាកសាងអំពីឥដ្ឋ និងថ្ម ហើយត្រូវកសាងឡើងវិញជាច្រើនលើកច្រើនសារ ។ ចេតិយតូចៗបួននៅត្រង់ជ្រុងទាំងបួនលើកំពូលកសាងឡើងប្រហែលជាក្នុងសតវត្សទី១៤ ដោយពួកភូមា ។ ចំណែកឯពុទ្ធចេតិយដ៏ចាស់បំផុតនេះត្រូវបានគេចម្លង តាមចេតិយនៃដើមរជ្ជកាលស្តេច ហ្គុប្ត ។

**4-Memorial Hall of Queen Maya and the Pond**

On the rear of the stone pillar of king Asoka there is a white colored building, that is the commemoration hall of Queen Maya.On its walls there are painted pictures of the birth of the buddha amongst other things. In front of the stone pillar and the commemration hall there is a great pond from which it is said that water had been taken from it on rinse and bathe the Buddha at the time of this birth.

**5-The Bodhi Tree (Buddhagaya)**

Buddhagaya is six miles south of the town of Gaya ! The Buddha Attained There full illumination under the Bodhi tree. This place is the most important center for the Buddhist s going on pilgrimage, The picture comprises a part of the stone railing and the temple.



**6-The Great Stupa of Buddhagaya**



The great Stupa of Buddhagaya buit with bricks and stone and has undergone rebuilding at various times . The four little stupas on the corners at top are approximately of the 14th century they were built by Burmese. As to the oldest Buddha stupa ot can be traced back to the early Gupta period.

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា សឺន សាន




**ដោយ : ម៉ម យឹន**

**(តពីលេខមុន)**

ថ្នាក់ជាន់ខ្ពស់ដឹកនាំទៅបាននាំគ្នាធ្វើដំណើរចេញទៅយ៉ាងសង្ងាត់អង់អាចក្លាហានទៅតាមច្រកផ្លូវចូលដែលក្រុមកងសម្ងាត់បានចូលទៅរៀបចំទុកឱ្យជាមុនស្រេចហើយនោះ ដោយគ្មានភ័យព្រួយពីការវាយប្រហារតបតពីកងទ័ពខ្មែរយួនឡើយ ។ ពីព្រោះមានសេចក្តីរាយការណ៍របស់បណ្តាញព័ត៌មានសម្ងាត់ កជរបខ បានផ្តល់មកឱ្យយ៉ាងទៀតទាត់ហើយពិតប្រាកដផង ។

លុះហៀបទៅដល់ទីដៅដែលត្រូវវាយប្រហារ ហើយមេបញ្ជាការបានហៅប្រជុំមេសំខាន់ៗទាំងអស់មកឱ្យបញ្ជា និងបេសកកម្មដែលត្រូវបំពេញនៃក្រុមប្រយុទ្ធនីមួយៗ ។

លុះស្រេចបាច់សព្វគ្រប់ហើយ ទើបបើកការបញ្ជាយុទ្ធជនឱ្យលបចូលទៅដោយសន្សឹមប្រុងប្រយ័ត្នយ៉ាងខ្លាំងក្លាបំផុត តាមក្បួនយុទ្ធសាស្ត្រទៅតាមបញ្ជារបស់មេបញ្ជាការ ។ ការរំកិលខ្លួនដោយសម្ងាត់នៃយុទ្ធជនបានប្រព្រឹត្តទៅដោយស្ងាត់ស្ងៀម និងប្រុងប្រយ័ត្នបំផុតសំដៅទៅរកទីតាំងរបស់ខ្មាំង ។

នៅពេលទៅដល់ចំណុចរៀងៗខ្លួន ក្រុមនីមួយៗត្រូវត្រៀមខ្លួនតាំងសតិស្មារតីរងចាំមេបញ្ជាការឱ្យបញ្ជាចាប់ផ្តើមផ្ទុះអាវុធ មុនដំបូងកងកាំភ្លើងធំ និងកងបាញ់កាំជ្រួចផ្លោង ចាប់ផ្តើមបាញ់ ភឹង ភឹង ភឹង ឡើងសន្ធាប់យ៉ាងទ្រហឹងអឺងអាប់ លាយនិងស្នូរផ្ទុះឡើង ដោយមានអណ្តាតភ្លើង ផ្សែង អាប់ពាសពេញទីតាំង ។

ពេលនោះយុទ្ធជនស៊ូស្លាប់វាយលុក ក៏ចាប់ផ្តើមរំកិលខ្លួន ចូលទៅឱ្យជាប់នឹងរបងការពារទីតាំងរួចហើយកំទេចឧបសគ្គទាំងអស់ មានរបងនិងគ្រាប់មីនជាដើម ។

រួចហើយរកច្រកដែលមានសន្តិសុខគ្រប់គ្រាន់រត់ចូលសម្រុកទៅកំទេចទីកន្លែងសំខាន់ៗឱ្យខ្ទេចខ្ទីអស់ ហើយកាន់កាប់ជាតំណាក់ៗ រហូតបានទទួលជោគជ័យទាំងស្រុង ។

បន្ទាប់មកមេបញ្ជាការ ចេញបញ្ជាឱ្យកងការពារសន្តិសុខ និងកងប្រមែប្រមូលគ្រប់ធន់អាវុធតូចធំ និងសម្ភារៈសឹកសំខាន់ៗ ដូចជា វិទ្យុទាក់ទងជាដើម ។

រីឯសម្ភារៈសឹក និងគ្រាប់រំសេវមួយចំនួនត្រូវកំទេចចោលនៅពេលដកទ័ពចេញពីទីតាំងនោះ ។

សកម្មភាពប្រតិបត្តិការសឹកសំខាន់ៗរបៀបនេះមានធ្វើជាច្រើនលើកណាស់ ហើយនៅពេលធ្វើម្តងៗតែងតែមានភ្នាក់ងារយកព័ត៌មានអន្តរជាតិបានចូលតាមទៅយកព័ត៌មានជាមួយជានិច្ច ហើយអ្នកយកព័ត៌មានទាំងនោះមិនមានទទួលគ្រោះថ្នាក់អ្វីទេ គឺមានតែបន្តិចបន្តួចប៉ុណ្ណោះ ។

សូមជំរាបបញ្ជាក់ថា រូបខ្ញុំបាទ ដែលជាអ្នកនិពន្ធប្រវត្តិនៃរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ និងកងទ័ពជាតិរំដោះប្រជាពលរដ្ឋខ្មែរនេះ គឺជានាយទាហានជាន់ខ្ពស់ម្នាក់ជាសហការីផ្ទាល់របស់លោកតាប្រធាន សឺន សាន និងលោកឧត្តមសេនីយ៍ សក់ ស៊ុតសាខន បានចូលរួមក្នុងភារកិច្ចសំខាន់ៗជាច្រើននៅក្នុងកិច្ចប្រតិបត្តិការសឹករំដោះប្រទេសជាតិខ្មែរនេះ ដូចមានជីវប្រវត្តិរបស់ខ្ញុំបាទជូនជ្រាបនោះដែរ ។

**ភាគ១៥-សកម្មភាពអ្នកសារព័ត៌មានអន្តរជាតិជាមួយអ្នកតស៊ូ**

នៅក្នុងរឿងអ្នកសារព័ត៌មានអន្តរជាតិនេះទៀតសោតរូបខ្ញុំបាទ បានធ្វើដោយផ្ទាល់ជាច្រើនលើក ដើម្បីជួយអស់លោកទាំងនោះ ។ ខ្ញុំបាទសូមលើកតួយ៉ាងមួយ គឺនៅរាត្រីយប់មួយនារដូវវស្សា នៅតាមជាយដែនខ្មែរ-សៀម វាលស្រែ



និងផ្លូវថ្នល់ទាំងអស់ពោរពេញទៅដោយទឹកលេចស្មើរតែធ្វើដំណើរពុំកើតមានតែរថយន្តដែលមានកង់ខ្ពស់ទេ ដែលអាចបើកបរបាន ។ ពេលនោះរូបខ្ញុំបាទជាអ្នកទទួលខុសត្រូវកិច្ចការទំនាក់ទំនងជាមួយអាជ្ញាធរកងទ័ពជាតិថៃ ត្រូវតែបំពេញមុខនាទីដ៏សំខាន់នេះ ។ លោកអគ្គមេបញ្ជាការឱ្យយករថយន្ត២គ្រឿងទៅទទួលយកភ្នាក់ងារសារព័ត៌មានអន្តរជាតិមួយក្រុមមានបួនរូប ដែលទើបត្រឡប់មកពីស្រុកខ្មែរមកដល់ភ្នំម៉ាឡៃនាយប់នោះប្រមាណម៉ោង១២អធ្រាត ។

ក្រោយពីបានបញ្ជានេះភ្លាម ខ្ញុំបាទបានទាក់ទងជាមួយកងទ័ពថៃ រួចសុំការជួយពីកងទ័ពជាតិថៃ ដើម្បីទៅទទួលយកអ្នកសារព័ត៌មាននោះតាមកំណត់ពេលវេលា ។ **តទៅលេខក្រោយ**

## តមកពីទំព័រទី ១ លោក បារ៉ាក់ អូបាម៉ា ឈ្នះម្តងទៀត

មនុស្សចាស់និងក្មេង ក៏ចេញមកយ៉ាងកកកុញ ជាពិសេសជនជាតិភាគតិច ដូចជាក្រុមស្បានីស ៧៣% និងអាស៊ាន អាមេរិកាំង៧១% ជាចំនួនដ៏ច្រើនមិនដែលមាន ។ នយោបាយលោក អូបាម៉ា បានត្រូវគេវិភាគថា ជាទីចំណូលចិត្តលើវិស័យយកចិត្តទុកដាក់ពីបញ្ហាអន្តោប្រវេសន៍ បញ្ហាជំនួយដល់ការថែសុខភាព បញ្ហាទប់ទល់វិបត្តិសេដ្ឋកិច្ចយ៉ាងប្រឹងប្រែង... ។ល។ គឺសម្លេងឆ្នោតរបស់ក្រុមយុវវ័យ និងជនជាតិភាគតិចអាមេរិកាំង ដែលបានធ្វើឱ្យ មីត រ៉មនី របូតចេញពីការប្រកួត ។

នៅឡូវែលតំបន់ដែលសម្បូរណ៍សហគមន៍ខ្មែររស់នៅបានត្រូវលោក វ៉ាស្នា នួន មន្ត្រីគណក្រុមប្រឹក្សាក្រុងសម្តែងការរីករាយ និងឃើញសមាជិកនៃសហគមន៍ខ្មែរចេញទៅបោះឆ្នោតច្រើនគ្នា លោកប៉ាន់ស្មានថា មានប្រមាណជា២០០០នាក់ដែរ ដែលបានចេញទៅបំពេញភារកិច្ចជាពលរដ្ឋអាមេរិកាំង ។ លោកបានបន្តថា ចាប់ពីនេះតទៅសហគមន៍ដទៃកំពុងមើលឃើញថា សហគមន៍ខ្មែរជាសហគមន៍សកម្ម និងទទួលបាននូវការយកចិត្តទុកដាក់ពីសំណាក់អ្នកគ្រប់គ្រង ច្រើនជាងពេលមុនៗ។

នៅរដ្ឋម៉ាស្សាឈូសែតដែលមានលោក រ៉មនី ធ្លាប់ធ្វើចៅហ្វាយក្រុង(Governor) សម្លេងឆ្នោតរបស់លោកបានតែ៣៧% ទល់នឹង អូបាម៉ា ៦៣% នៅញូយ៉កសម្លេងឆ្នោតសម្រាប់ អូបាម៉ា មានរហូតដល់ ៨១% ទល់ រ៉មនី តែ៧%ប៉ុណ្ណោះ ។ នៅមានតំបន់ជាច្រើនដែលសម្លេង រ៉មនី និងអូបាម៉ា នៅប្រកិតគ្នា ហើយ រ៉មនី បានឈ្នះនៅតំបន់កណ្តាលស្ទើរទាំងអស់ ធ្វើឱ្យគាត់សង្ឃឹមថា អាចនឹងផ្តល់តំណែងជាស្ត្រីទី១ ដល់ភរិយាគាត់ បានរួចខ្លួនទៅហើយ ។ ផ្ទុយពី រ៉មនី-អូបាម៉ា យកបានតំបន់ក្នុងរដ្ឋសំខាន់ៗដែលមានមនុស្សច្រើនរស់នៅ ដែលជាហេតុធ្វើឱ្យចំនួនប្រតិភូលោកឡើងលឿនជាង ។


ឡូវែល: ទោះជាឈឺក៏ត្រូវតែ ទៅបោះឆ្នោតដែរ

ប្រជាពលរដ្ឋអាមេរិកាំង នាពេលនេះបានទទួលយកជ័យជំនះរបស់ អូបាម៉ា យ៉ាងរីករាយយ៉ាងត្រចះត្រចង់ ហើយទទួលស្គាល់ថា ជាប្រធានាធិបតីដ៏អស្ចារ្យ ។ នៅក្នុងសន្ទរកថា ជោគជ័យ នារាត្រីថ្ងៃទី៦ លោក អូបាម៉ា បាន "ថ្លែងអំណរគុណ"ដល់ប្រជាជាតិអាមេរិកាំងដែលបានធ្វើឱ្យអត្ថន័យនៃ"សហព័ន្ធ"ដែលបានចាប់កំណើតពីជាង២០០ឆ្នាំមកហើយ មានដំណើរទៅមុខ ...បោះឆ្នោតចប់ហើយ ការងារពុំទាន់បានចប់នៅឡើយទេ...!។

នៅហ្វីឡាដែលហៀសហគមន៍ខ្មែរក៏បានបំពេញភារៈកិច្ចណែនាំសមាជិកសហគមន៍ខ្លួនយ៉ាងសកម្មណាស់ដែរ -ក្រុមអ្នកបញ្ញវ័ន្តខ្មែរបានប្រកួកហៅគ្នា ដើម្បីជួយណែនាំដល់បណ្តាបងប្អូនខ្មែរដែលត្រូវការជំនួយបោះឆ្នោតដោយស្ម័គ្រចិត្ត ។ គណកម្មការឃោសនា អូបាម៉ា នៅហ្វីឡាបានដាក់ការផ្សាយឃោសនាមួយក្នុងទំព័រ "ខ្មែរផូស" បានផ្តល់អត្ថន័យថា សារព័ត៌មានខ្មែរមានសារសំខាន់ចំពោះជនភាគតិចខ្មែរ គឺការលើកតម្កើងមួយ គួរឱ្យកត់សម្គាល់បាន ។ នេះជាសញ្ញានៃការរីបំរះរបស់ខ្មែរនៅហ្វីឡាដែលកំពុងទទួលលទ្ធផលផ្លែផ្កាជាខ្មែរ-អាមេរិកាំងជាបណ្តើរៗហើយ ៕

### 1. Election Results

| Candidate | Popular vote | Percentage | Electoral votes (270 to win) |
|---|---|---|---|
| Barack Obama | 60662174 | 50% | 303 |
| Mitt Romney | 57820742 | 48% | 206 |

| | Control of House<br>218 Balance of power | |
|---|---|---|
| 193 Democrat | | 233 Rep. |

| | Control of Senate<br>50 Balance of power | |
|---|---|---|
| 53 | | 45 Rep. |

Last Updated: Nov 8, 2012 2:12 AM
Source: AP

## តមកពីទំព័រទី ៣ តើទិវាមាតាមានន័យអ្វីសម្រាប់...

ទាំងអស់របស់អ៊ុ.នឹងដល់ម្តាយ គឺនឹកដល់ចុងឈើទាលមួយដើមខ្ពស់នៅចុងភូមិ.នឹកដល់ខ្លែងឯកទំទឹៗ នៅលើមេឃខៀវស្រឡះ.នឹកដល់វត្តអារ៉ាមដែលមានព្រះសង្ឃស្វាធ្យាយធម៌អាថិ: ឥ.ឱ. ឳ...ព្រោះហេតុអ្វីទៅ? ព្រោះនៅកុមារពេលមកពីរៀនឃើញចុងឈើទាលពីចំងាយអ៊ុំខំរត់យ៉ាងលឿនទៅជួបម៉ែឱបត្រសុលចូលក្នុងទ្រូងគាត់។ ឃើញខ្លែងហើរលើមេឃខំរត់ទៅរកម៉ែដោយដឹងថា ម៉ែកំពុងច្រូតស្រូវនៅក្នុងស្រែក្បែរភូមិ ព្រោះខ្លែងនោះជាខ្លែងរបស់បងប្រុសអ៊ុំកំពុងចងខ្សែទុកចោលក្បែរនោះ ហើយខំជួយច្រូតស្រូវម្តាយតែអ៊ុំរត់ទៅពុំមែនចង់ជួយច្រូតទេ តែចង់រាវរកក្នុងកញ្ជើដែលគាត់ទូលទៅពីព្រឹកនោះមើល តើនៅសល់នំចំណីអីខ្លះទេ ។ ដោយម្តាយតែងតែនាំទៅវត្តពេលបានឈប់សម្រាកពីសាលាដើម្បីឱ្យស្តាប់ធម៌ ឬក៏លោកទេសនាហេតុនេះ ពេលទៅណាកាត់ទទឹងវត្តចិត្តអ៊ុំក៏នឹកព្រួចដល់ម៉ែ . ឥឡូវមាននៅក្មេងអីទៅវត្តក្មេងៗហៅថា"លោកតាៗ" ទៅហើយតែចិត្តស្រឡាញ់ម្តាយនៅតែចាំមិនភ្លេចឡើយ ទោះបីមានប្រពន្ធមានកូន ព្រមទាំងមានចៅយ៉ាងច្រើនទៅហើយ ។ នឹកដល់ខ្លួនឯងមានចៅ ទើបនឹកឃើញថា អ៊ុស្រីរបស់ ក្មួយមិនគ្រាន់តែទៅជាមាតាទេ តែបានទៅជាលោកយាយទៅហើយៗចេះតែត្រូវនៅបែកគ្នាពីអ៊ុំមួយចំហៀងផែនដីម្នាក់មិនដឹង តើបានកូនចៅរៀបចំធ្វើពិធីទិវាមាតាជូនគាត់ ឬទេ បើអ៊ុំនៅក្បែរប្រហែលនឹងបាននិយាយថា: "បងស្រឡាញ់អូននឹកអាណិតអូនច្រើនណាស់!" ហើយអាចបានរំលឹកឡើងវិញនូវអនុស្សាវរីយ៍កំសត់ ឬផ្អែមល្ហែមជាមួយគ្នាតាំងពីពេលសក់បប្រាស់ស្មានៃវ័យស្បថស្បែររហូតដល់វ័យថ្ពាល់ខ្ញង. ភ្នែកស្រវាំង. របស់មួយមើលឃើញថា ពីរបី. សក់ក៏សព្រោងពេញក្បាល... អនុស្សាវរីយ៍រាប់ម្តេចអស់?សូមមាតាទាំងឡាយលើពិភពលោកបានជួបតែក្តីសុខសប្បាយ.ជួបប្រទះតែសំណាងល្អ.សប្បាយរីករាយជាមួយកូនប្រុសកូនស្រីកតញ្ញូ ពិសេសបានរស់ក្រោមដំបូលប្តីដ៏ល្អ... ៕

# វិធីបន្ធូរនិងលំហែកាយនិងចិត្ត និងក្រេបជញ្ជក់រស់ជាតិជីវិត

# Method how to relax mind and body in order to enjoy life.

**តពីលេខមុន**

ប្រៀបលើអ្នកម្ខាងទៀត ពីព្រោះអ្នកឈរលើជំហរតុល្យភាពឈរលើវេទនាលើរូបកាយ (ដែលចាត់ទុកដូចជាយុតការ) អ្នកពុំបណ្តោយឱ្យប្រព័ន្ធខួរក្បាលប្រព័ន្ធម៉េម៉ូរីដឹកនាំផ្តាច់មុខឡើយ (មនោសញ្ចេតនាអវិជ្ជមាន កំហឹង ភ័យ ព្រួយ ច្រណែន ត្រូវបានគ្រប់គ្រងតាមរបៀបនេះ) ។

(ឈ) មនុស្សជាប់ផុងក្នុងអារម្មណ៍អវិជ្ជមាន

មនុស្សជាប់ផុងក្នុងអារម្មណ៍អវិជ្ជមានសំដៅយកជនណាដែលទទួលការកៀបសង្កត់អំពីទំលាប់ខុសប្លែកពីមនុស្សធម្មតា ដូចជាកំហឹងងាយផ្ទុះ ហើយជួនកាលគ្មានហេតុផល ឬដោយហេតុផលតិចតួច ។ អ្នកខ្លះកើតទុក្ខរីងរៃទាំងកាយទាំងចិត្តគ្មានពេលលំហែរ គេកើតទុក្ខដោយខកចិត្តពុំបានសំរេចបំណងណាមួយក្នុងជីវិត ដោយប្រតប្រាស់ពីជនជាទីស្រឡាញ់ ដោយជួបនឹងការខូចខាតណាមួយជាទមន់ ។ បើជននេះចេះបញ្ចូលរបៀបតម្រង់សតិបើកទូលាយទៅក្នុងការរស់នៅបានញឹកញាប់ ជាពិសេសបំផុតរបៀបកត់សំគាល់វេទនាលើនិងក្នុងរូបកាយរបៀបសំរួតសតិពីក្បាលដល់ចុងជើងពីចុងជើងដល់ក្បាល យឺតៗ ឬរីតចុះឡើងញឹកញាប់ You just note and scan your body sensations very often ទំលាប់ចាស់នឹងបាក់ស្រុតរលាយបាត់បង់ឥទ្ធិពលពីរូបកាយជននេះពុំខានឡើយ ពន្លឺនៃសុភមង្គលនឹងត្រឡប់កើតមានចំពោះគេជាក់ជាពុំខានឡើយ ។

ជាក់ស្តែងអ្នកដែលជួបនឹងអារម្មណ៍ទុក្ខព្រួយជាប់ជានិច្ចអារម្មណ៍ត្រូវតណ្ហាដុតរោលទាំងថ្ងៃទាំងយប់ពុំមានស្រាកស្រាន្តកំហឹងក្តៅងំក្នុងខ្លួនជាប់ជានិច្ចការជាប់ជំពាក់នឹងរឿងអ្វីមួយកើតភាពអស់សង្ឃឹមក្នុងជីវិត តើអ្នកត្រូវធ្វើយ៉ាងណាឱ្យរួចផុតពីស្ថានភាពជាប់ឃុំខ្លួនឯងក្នុងគុកពិភពចិត្តមនុស្សនេះ ? ចូរអ្នកប្រើវិធីការតម្រង់សតិបើកទូលាយដូចខ្ញុំជំរាបខាងលើ ។ បើអារម្មណ៍ទាំងនោះលេចឡើងមកក្នុងចិត្ត សូម (១) គ្រាន់តែដឹងថា មានអារម្មណ៍ទាំងនោះ លេចមកហើយស្លុបត្រឹមនោះ (២) ពុំពិចារណា ឬជជែកតវ៉ារកខុសត្រូវឡើយ ពុំវាយតម្លៃល្អ ឬអាក្រក់ឡើយ (៣) បើកផ្លូវឱ្យអារម្មណ៍ទាំងនោះ បញ្ចេញរូបភាពតាមចិត្ត Allow Allow everything to manifest ចូរចាត់ទុករូបអ្នកដូចជាដបអ្នកពុំមែនជារបស់ក្នុងដបឡើយ អ្នកជាសតិដឹងជាចិត្តបរិសុទ្ធឋិតនៅពីក្រោយបាតុភូតលំហូរអារម្មណ៍ទាំងនោះ ។ បើអ្នកអាចអនុវត្តបីចំណុចនេះបានអារម្មណ៍ស្មុគស្មាញខ្មៅងងឹតទាំងនោះពុំអាចមានកន្លែងឈរក្នុងផ្ទៃចិត្តអ្នកឡើយ វានឹងរលាយបាត់រូបមួយរំពេចអស្ចារ្យណាស់ ជាក់ស្តែងណាស់ពិតប្រាកដណាស់ ។ ជាការប្រសើរ សូមអនុវត្តឈប់សំរាកពិនិត្យចិត្តលំហូរគំនិត អារម្មណ៍ របស់អ្នកញឹកញាប់ ឬអាចឆ្លៀតសំរាករយៈពេលមួយនាទីក្នុងមួយម៉ោង បើអាចធ្វើទៅបាន ។

ឧទាហរណ៍អំពីរបៀបតម្រង់សតិបើកទូលាយដែលខ្ញុំរៀបរាប់ជាគំរូខាងលើនោះ សូមអ្នកយកវាមកបំបែកបញ្ចូលទៅក្នុងគ្រប់សកម្មភាពនៃជីវិតរបស់អ្នក ចូរអ្នកហាត់លេងប្រឡែង ជាមួយពិភពចិត្តអ្នកហាត់លោតផ្លោះពីការតម្រង់សតិរូមរឹតមកការតម្រង់សតិបើកទូលាយ ឬបញ្ច្រាស់ទៅវិញ ចុះឡើងៗ បន្តិចម្តងៗ របៀបទាំងនេះនឹងក្លាយទៅជាទំលាប់គុណភាពជីវិតអ្នកនឹងកាន់តែមានពន្លឺរស្មីភាពក្សេមក្សាន្តកាន់តែរីកធំឡើងៗ ។

ការតម្រង់សតិបើកទូលាយនាំមកនូវភាពធូរស្រាលក្នុងចិត្តនិងអារម្មណ៍ សន្តិភាពផ្លូវចិត្ត សេរីភាពក្នុងចិត្តបានរួចរំដោះពីទុក្ខសោកព្រួយបារម្ភ កើតប្រាជ្ញាភ្លឺថ្លា ក្តីសប្បាយរីករាយ ជីវិតមានខ្លឹមសារ ជីវិតមានន័យ មានសំរស់ និងប្រកបដោយសុភមង្គល ។ ខ្ញុំសូមរៀបរាប់បន្ថែមចំណុចជាក់ស្តែងទាំងនោះដូចខាងក្រោមៈ

(១) ការតម្រង់សតិបើកទូលាយនាំឱ្យមនុស្សពិសោធន៍វេទនាពហុញ្ញាណដោយផ្ទាល់ពិសោធន៍ដោយផ្ទាល់ក្នុងលំហរសតិដឹងក្នុងលំហរចិត្តបរិសុទ្ធពិសោធន៍ដោយផ្ទាល់នូវធម្មជាតិពិតរបស់ខ្លួន ។ មនុស្សមានសមត្ថភាពអាចរស់នៅក្នុងដំបន់ហួសផុតពីឥទ្ធិពលកាយនិងចិត្ត ម៉េម៉ូរី ការចងចាំ ។Man can live beyond his own mind and body and beyond times ។ បើតាមន័យសាសនា គឺថាមនុស្សអាចរស់នៅផុតចាកកម្មផលទាំងឡាយផុតអំពីឥទ្ធិពលរបស់ ម៉េម៉ូរី ឬការចងចាំផុតឥទ្ធិពលនៃទំលាប់អាក្រក់ដែលបានអាត់ទុកក្នុងប្រព័ន្ធរាងកាយ កោសិការ ខួរក្បាលនិងពិភពផ្លូវចិត្តក្នុងជាតិនេះ ក៏ដូចជាពីជាតិនានាកន្លងមក ។ នេះជាពិសោធន៍ការរួចរំដោះជាពិសោធន៍ព្រះនិព្វានក្នុងជីវិតដែលយើងកំពុងឆ្លងកាត់នេះ ជាការពិសោធសេរីភាពក្នុងចិត្តមនុស្សនេះ ។ នេះជាអព្ភូតហេតុមហាអស្ចារ្យ Miracle ដែលអាចកើតមានក្នុងរូបមនុស្សគ្រប់ៗគ្នាពុំលើកលែងនណាឡើយ ។ ប៉ុន្តែមនុស្សយើងពុំដឹងពុំយល់យើងរស់នៅក្នុងភាព វង្វេង មោហៈ រស់នៅមួយថ្ងៃសំរាប់មួយថ្ងៃពុំបានយល់និងមើលឃើញទិដ្ឋភាពរួមនៃជីវិតឡើយ The big picture of life ។

(២) ក្នុងសភាពជាក់ស្តែង ការតម្រង់សតិរួមរិតនាំឱ្យលំហរផ្ទៃចិត្តមនុស្ស ចង្អៀត ណែន តឹងផ្អឹះ ។ ពេលនេះអត្តបុគ្គល ឯ្យ បានសោយរាជ្យផ្តាច់មុខលើលំហរចិត្តទាំងមូល ។ លុះដល់មនុស្សប្រើការតម្រង់សតិបើកទូលាយផ្ទៃចិត្តក៏ត្រូវបើកទូលាយធំឡើងៗ ក្នុងលំហរនោះ ពុំមានអត្តបុគ្គលតែមួយមុខប៉ុណ្ណោះឡើយ មានបន្ថែមទាំងសតិដឹងអំពីការឃើញ ក្លិនសូរសៀង រស់ជាតិ ការប៉ះពាល់ និងវេទនារូបកាយនានាផង ។ ដោយប្រៀបនឹងផ្ទៃចិត្តដែលកាន់តែរីកធំឡើងៗ អត្តបុគ្គលនេះកាន់តែរួមតូចទៅៗជូនអត្តបុគ្គលនេះអាចបាត់រូបម្តងៗ **តទៅលេខក្រោយ**

# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំហេង

ជោគជតាប្រចាំសប្តាហ៍

**ឆ្នាំជូត**

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះវាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

**ឆ្នាំឆ្លូវ**

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមកហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណងហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងឃាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហា គូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

**ឆ្នាំខាល**

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើន គួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀត គម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

**ឆ្នាំថោះ**

នៅក្នុងរយៈពេលនេះលោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរការកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

**ឆ្នាំរោង**

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

**ឆ្នាំម្សាញ់**

អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

**ឆ្នាំមមី**

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះ សុទ្ធតែផ្តល់នូវអត្ថប្រយោជន៍គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀតនោះគម្រោងការដែលបានត្រៀមទុកជាយូរមកហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

**ឆ្នាំមមែ**

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះចូរធ្វើចិត្តឱ្យត្រជាក់ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

**ឆ្នាំវក**

រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹង-ដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពួនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

**ឆ្នាំរកា**

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗនាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

**ឆ្នាំច**

រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញអាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហា ចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំរាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះសូមប្រយ័ត្ន កុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ៕

**ឆ្នាំកុរ**

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ។

## តមកទំព័រទី ៩ ឥទ្ធិពលនៅកម្ពុជាបន្ទាប់ពីរជ្ជកាល...

ជាដើម រីឯកម្ពុជារាជការដែលបំរើការរាជរដ្ឋាភិបាលចាប់កំណើតនៅឆ្នាំ១៩៤៦តែប៉ុណ្ណោះ ម្ល៉ោះហើយការអនុវត្តន៍បទពិសោធន៍ថ្មីថ្មោងច្រើនជួបប្រទះនូវការភ្លាត់ភ្លាំង ឬទទួលការបង្ក្រាបយ៉ាងចាស់ដៃ ។ អ្នកនយោបាយខ្មែរជំនាន់ឆ្នាំ ៤០-៥០-៦០ ដូចជា អៀវ កើស,ទ្រង់យោធិវង្ស, អាចារ្យ ហែម ចៀវ, ស៊ិម វ៉ា, ឌុច រ៉ាស៊ី, ខៀវ សំផន,ហ៊ូ យន់, ហ៊ូ នឹម, សុទ្ធតែបានចូលរួមគ្រប់គ្រងនយោបាយប្រទេសប្រកបដោយជំនឿថាបានជួយកសាងប្រទេសដោយមិនខ្លាចអំណាចស្តេចផែនដី ។ ក្រោយមកនៅពេលដែលព្រះបរមរាជវាំងទៅចងសម្ព័ន្ធភាពនៅក្នុងការបីបាច់របស់ចិនប៉េកាំងកុម្មុយនីស្តមកបាននាំអ្នកនយោបាយជំនាន់ក្រោយៗឱ្យធ្លាក់ក្នុងកណ្តាប់ដៃកុម្មុយនីស្តទាំងអស់ទាំងអ្នកតស៊ូទាំងអ្នកធ្លាប់ប្រឆាំងចាប់ពីឆ្នាំ១៩៧០មក រាស្ត្រខ្មែរគ្មានជំរើសក្រៅពីប្លុកខាងកើតនៃបក្សកុម្មុយនីស្តទេ ។ សូម្បីតែមកដល់ឆ្នាំ១៩៩១នៃកិច្ចព្រមព្រៀងក្រុងបារីសឱ្យសិទ្ធិខ្មែរចាកចេញពីកុម្មុយនីស្ត ហើយក៏ដោយក្តីក៏ឆ្នាំបន្តបន្ទាប់ពុំឃើញមានសញ្ញាណាមួយថា អ្នកនយោបាយខ្មែរអាចមានអ្នកណាម្នាក់ហ៊ានប្រឈមមុខនឹងកុម្មុយនីស្តយ៉ាងចំហរនៅឡើយទេ ។ ការវិវត្តន៍នៃនយោបាយខ្មែរ រហូតមកដល់សព្វថ្ងៃបើទោះជាមានចលនាសេរីនិយមខ្លះក្តីក៏ស្ថិតនៅក្នុងដំណោះស្រាយនៃប្លុកកុម្មុយនីស្តដដែលពីព្រោះគ្មានអ្នកដឹកនាំនយោបាយថ្មីនៃចលនាសេរីនិយមមានកម្លាំងគ្រប់គ្រាន់ និងស្មារតីភ្ញាក់រលឹកពីភាពសណ្តំនៃសេរីភាពកុម្មុយនីស្តនៅឡើយ ។ ថែមពីលើនេះទៀត ភាពទាស់គ្នារវាងចិន-រុស្ស៊ី និងវៀតណាមមិនត្រឹមតែមិនបានជាប្រយោជន៍ដល់អ្នកនយោបាយដែលធ្វើឱ្យរាស្ត្រខ្មែរយល់ថា "ជាអ្នកដឹកនាំទៅរកលទ្ធិសេរីនិយមនៃប្លុលលោកសេរី"តែប៉ុណ្ណោះទេ ថែមទាំងជឿលើសេចក្តីសង្ឃឹមដែលប្លុកកុម្មុយនីស្តលើកមកបង្ហាញថែមទៀត ។ មកទល់ថ្ងៃនេះ គេពុំទាន់គម្លាតទស្សនៈគ្រប់គ្រងប្រទេសកម្ពុជានៅឆ្ងាយពីទស្សនៈនៃអតីតកាលព្រះបរមរាជវាំងដែលធ្លាប់តែឱ្យតម្លៃខ្ពស់ដល់កុម្មុយនីស្ត ហើយពីទីនោះអ្នកនយោបាយខ្មែរទាញយកប្រជាប្រិយភាពគ្រប់ៗគ្នាមិនឈប់ឈរ ។

**ទម្ងន់នៃបរទេសជិតខាង:** យន្តហោះចិនបានដឹកព្រះបរមរាជសពមកជូនពលរដ្ឋខ្មែរ-ព្រះញាតិវង្សបង្ហូរទឹកភ្នែកទឹកមុខស្រពាប់ស្រពោន -លោកនាយករដ្ឋមន្ត្រីខ្មែរ និងមន្ត្រីជាន់ខ្ពស់រៀបចំពិធីថ្វាយដំណើរអតីតព្រះមហាក្សត្រយ៉ាងធំ និងយ៉ាងយូរ ដើម្បីយាងទៅកាន់សុគតិភព ។ ប្រជាជាតិរួមទាំងអ្នកនយោបាយស្រងូតស្រងាត់តែរីករាយនិងកិត្តិយសផ្តល់ថ្វាយព្រះបរមសពតែពុំមាននរណាម្នាក់ក្រៅពីបរទេសដែលជាអ្នកសង្កេតការណ៍មើលឃើញអំណាចរបស់ចិនរបស់ព្រះបរមរាជវាំងនិងរបស់វៀតណាមកំពុងតែថ្លែងអំណរគុណគ្នាទៅវិញទៅមកចំពោះការដែលថែរទាំមនុស្សដ៏អស្ចារ្យបានផ្តល់សម្បត្តិមហាសាលបានផ្តល់ជ័យជំនះឱ្យពួកគេលើជ្រោយឥណ្ឌូចិនលើពិភពលោក ។ ចិន និងវៀតណាមបានផ្តល់ជ័យជំនះ និងទឹកដីដល់ព្រះមហាវិរក្សត្រដែលជាអ្នកបំរើដ៏ស្មោះត្រង់និងជឿជាក់ដល់ពួកគេរហូតដល់ថ្ងៃចូលទិវង្គត់តែមិនបានផ្តល់ព្រលឹងសេរីភាពដល់ពលរដ្ឋខ្មែរដែលជាម្ចាស់នៃទឹកដីទេ ។ ប្រទេសចិនថ្វីត្បិតតែបានវាយប្រដៅនាគប្អូនវៀតណាម នាឆ្នាំ១៩៧៩ ម្តងតែពុំមានប្រវត្តិលើទ័ពទៅលុកលុយយកដីបរទេសដូចវៀតណាមទេ ។ ចិន និងកូរ៉េខាងជើងយល់ស្របគ្នាចំពោះតួនាទីមគ្គុទេសកុម្មុយនីស្តរបស់ចិននៅលើពិភពលោក រីឯអ្នកទាំងពីរយល់ស្របគ្នាកាលពីឆ្នាំ១៩៥០ ឱ្យវៀតណាមមានតួនាទីគ្រប់គ្រងឥណ្ឌូចិន ហើយអ្នកទាំងបីយល់ស្របគ្នាថ្វាយរង្វាន់ព្រះបរមរាជវាំងដល់សម្តេចឪ និងព្រះរាជ

តទៅទំព័រទី ១៩

តមកពីទំព័រទី ១៨

# ឥទ្ធិពលនៅកម្ពុជាបន្ទាប់ពីរជ្ជកាល...

វង្សក្រៅពីនេះគ្មាននរណាទៀតទេ ។ កិច្ចព្រមព្រៀងក្រុងបារីស១៩៩១ ត្រូវបានបង្វិលកែប្រែរូបរាង ពង្វក់ ឬសណ្តំ តាមក្បួនភូតភរកុម្មុយនីស្តគ្រប់បែបយ៉ាង ដើម្បីតែ"ដំណោះស្រាយកុម្មុយនីស្ត"ទាំងនោះតែប៉ុណ្ណោះ ពេលនេះប្លុកកុម្មុយនីស្តថ្មី (មានចិនដឹកមុខ)ពុំទាន់មានកម្លាំងទ័ពគ្រប់គ្រាន់សម្រាប់ប្រឈមមុខប្លុកលោកសេរីនៅឡើយទេ ។ ប្រទេសមួយទៀតដែលនៅទ្រឹងនៅឡើយតែកង់ប្រវត្តិសាស្ត្រនៅតែវិលលឿននៅឡើយ ហើយជារឿងចាស់ឱ្យទៅជាថ្មីមិនចេះឈប់តែមនុស្សនៅតែមិនចងចាំប្រវត្តិសាស្ត្រវិលកង់ដដែល ។ យោងតាមទម្ងន់នៃនយោបាយប្រទេសជិតខាងកម្ពុជា គេនឹងពុំឃើញមានអ្វីផ្លាស់ប្តូរពីអ្វីដែលយើងឃើញសព្វថ្ងៃ បន្ទាប់ពីរជ្ជកាលសីហនុ នេះទេ ។

**ទម្ងន់នៃពលរដ្ឋ :** ខុសគ្នានឹង"រាស្ត្រ"ដែលជាឡើងជាអ្នកធំ រថយន្ត ទូរស័ព្ទ ទូរទស្សន៍ ទូរទឹកកកសូម្បីតែវត្តអារ៉ាម ក៏តែសោភ័ណភាពទទួលភ្ញៀវបានច្រើន... ។ល ។ តែភាពដែលមិនបានផ្លាស់ប្តូរ គឺការបែងចែកធន់ធានមិនស្មើភាពគ្នា មិនយុត្តិធម៌ -អំណាចដែលប្រើប្រាស់នៅតែជាការគម្រាមគាបសង្កត់ពុំមែនជាការថែរក្សាសន្តិសុខ ឬសន្តិភាព -ផលចំណេញរបស់ប្រជាជាតិនៅតែហូរចូលដៃនៃប្រទេសដ៏ទៃ -ប្រទេសជាតិខកខានពុំបានវិនិយោគលើអនាគតលើគ្រួសារលើកុមារលើភាពត្រឹមត្រូវបរិសុទ្ធ -ធនធានពុំបានធ្លាក់ចូលកើតឡើងលើប្រជាពលរដ្ឋខ្លួននេះ ដោយសារការផ្ទុះកំហឹងកើតនៅក្រៅពីការគ្រោងរបស់ក្រុមខ្លួននេះម្យ៉ាង ហើយម្យ៉ាងទៀត អ្នកនយោបាយប្រឆាំងនឹងរដ្ឋាភិបាលច្រើនយកនយោបាយដែលផ្តល់ផល"ចំណេញ"ដល់ខ្លួន ច្រើនជាយកនយោបាយ"ត្រូវនិងខុស"មកអនុវត្តន៍គ្រប់ព្រឹត្តការណ៍នយោបាយដែលនឹងបណ្តាលឱ្យរាស្ត្រអាចកត់សម្គាល់ចរន្តគំនិតដែលត្រូវរើបំរះ នាឱកាសចាំបាច់ប្រចាំជីវិតរបស់ខ្លួនបាន នេះជាការអប់រំចំណេះស្នេហាជាតិដែលប្រសើរបំផុត ។





ប្រតិកម្មតែនៅពេលវៀតណាមប្រើកម្ពុជា រហូតដល់រំលោភលើបូរណភាពទឹកដីរបស់គេ គឺប្រទេសថៃឡង់-ប្រទេសនេះគ្រប់គ្រងគាំទ្រចលនានៅកម្ពុជាដែលប្រឆាំង និងវៀតណាមដែលគេមើលឃើញថា ជាមហិច្ឆតាវាតទឹកដីវាតឥទ្ធិពលផ្តល់ភាពគ្រោះថ្នាក់ដល់ប្រទេសគេ ជម្លោះខ្មែរជាមួយថៃ គឺជាផ្លែផ្កានៃនយោបាយវៀត ណាម-ថៃ នាពេលនេះ ។ ប្រវត្តិកម្ពុជាដែលគេចងចាំនៅឡើយមុនពេលបារាំងមកដល់ខ្មែរពាក់កណ្តាល គឺខាងកើតទន្លេមេគង្គបានត្រូវយួនកាន់កាប់ រីឯផ្នែកខាងលិច គឺថៃកាន់កាប់ ។ រាំងថៃដែលចាប់ព្រះរាជបុត្រក្សត្រខ្មែរបីព្រះអង្គទៅចិញ្ចឹមជាឈ្លើយបានភ្ជាត់ស្មៀតបញ្ជូនព្រះរាជបុត្រមួយអង្គដែលគិតតែពីរៀនពីសិល្បៈចិនចេះច្បាំង ហើយថែមទាំងហៅថា ស្តេច"ខ្ទើយ"ថែមទៀតឱ្យមកសោយរាជនៅកម្ពុជាវិញ ពីព្រោះខ្មែរចេះតែបះបោរទាមទារស្តេចខ្លួនពេក -តែស្តេច "ខ្ទើយ" នោះគឺព្រះបាទអង្គឌួងបានគ្រប់គ្រងសន្តិភាពឱ្យកម្ពុជាបានប្រមាណ៥០ឆ្នាំ ហើយផ្តើមទាមទារឱ្យបារាំងមកត្រួតត្រាកម្ពុជាជំនួសសៀម រហូតបានសម្រេចនាឆ្នាំ១៨៥៤ ។ បារាំងបានពង្រីកទឹកដីកម្ពុជាឡើងវិញក្នុងរយៈពេល១០០ឆ្នាំ ដែលគេនៅជាអាណាព្យាបាលឱ្យបានទឹកដីដូច ដែលយើងឃើញសព្វថ្ងៃ ។ ប្រជាជនគ្រប់គ្រងក្រោមអំណាច"ស្តេចផែនដី" ពាក្យថា "ពលរដ្ឋ" គឺជាប់ទាក់ទងទៅនឹងបុព្វសិទ្ធផ្ទាល់ជាមនុស្សរស់នៅក្រោមការគ្រប់គ្រងនៃស្ថាប័នមួយដែលមានច្បាប់ជាមូលដ្ឋាន ។ រាស្ត្រ ឬពលរដ្ឋដែលក្រហើយពុំមានចំណេះធ្វើឱ្យមានការងាយស្រួលនឹងដឹកនាំទៅរកផ្លូវត្រូវនឹងរីកចំរើនក៏ដូចជាទៅរកផ្លូវខុស ឬលិចលង់ ។ នាសម័យបច្ចុប្បន្ននេះបច្ចេកវិជ្ជាទំនើបបានធ្វើឱ្យមានមនុស្សមានទំនាក់ទំនងធំធេង អ្នកក្រក៏អាចស្វែងរកចំណេះ និងចម្លើយល្អសំរាប់ជីវិតសម្រាប់គ្រួសារសម្រាប់សេដ្ឋកិច្ចបានដែរ ដោយមិនចាំបាច់ថាអ្នកនោះជាអ្នកដឹកនាំខ្លួនអ្វីទាំងអស់បាន ។ ទាំងនោះ ធ្វើសហគមន៍អ្នកភូតភរអ្នកប្រាជ្ញយកចំណេញពីលើខ្នងអ្នកក្រខ្សត់ខ្សោយមានការលំបាក និងស្វែងលាភសក្ការៈតាមវិធីជាទម្លាប់ខ្លួនបាន ។ មានប្រទេសខ្លះត្រូវរាស្ត្រ ឬពលរដ្ឋផ្តួលរំលំរចនាសម្ព័ន្ធដឹកនាំរបស់ខ្លួនបានដោយមិនចាំបាច់សំគាល់ថា នរណាជាអ្នកដឹកនាំបះបោរទៀតផង ។ នៅកម្ពុជារាស្ត្រ និងពលរដ្ឋកំពុងស្ថិតនៅក្នុងភាពផ្លាស់ប្តូរដ៏អស្ចារ្យមួយពាក្យសន្យា និងសេចក្តីសង្ឃឹមមានពាសពេញសព្វទិសទីលុយដុល្លារហូរហៀរចូលស្រុកភូមិករផ្ទះសម្បែងប្តូរពីស្លឹកទៅជាថ្មទៅជាប្រាសាទ អ្នកក្រទៅជាមាន អ្នកគ្មានអំណាចក្នុងភាគផលនៃគ្រួសារផ្ទាល់ខ្លួនចេះតែទៅហួសជាដំរាប... ។ យូរបន្តិចទើបភាពអស់សង្ឃឹម និងកើតឡើង ទើបនឹកដល់មេរៀននៃវិបត្តិអតីតកាលទើបដឹងថា ភាពអាក្រក់នៃរបបកុម្មុយនីស្ត ឬផ្តាច់ការមានលំនឹងនៅលើជីវិតអាត្មា ទើបដឹងថា ទាំងអស់គ្នាចាញ់បោកអ្នកជំនាញការខាងនយោបាយគ្មានសីលធម៌មានតែចំណេញ... នេះហើយដែលជាបុព្វហេតុនៃភាពរើបំរះរបស់រាស្ត្ររបស់ពលរដ្ឋ ។ កត្តាសំខាន់មួយទៀត គឺនៅមានចលនាមនុស្សអ្នកត្រូវគេជិះជាន់ធ្វើបាបទំហំធំតែងតែមានការហុចដៃនៃមហាអំណាចលោកសេរីជាទៀតទាត់ ដោយសារតែមេដឹកនាំរបស់គេចេញមកពីបរិស្ថានសេរីនិយមពីសុវណ្ណរាស្ត្រ ឬពលរដ្ឋដូចគ្នា គេយល់ពីការសង្គ្រោះអ្នកទន់ខ្សោយមានច្បាប់គ្រប់គ្រងយុត្តិធម៌ជាគោលការណ៍ ថ្វីត្បិតតែជាមូលដ្ឋានសហគមន៍ អ.ស.ប មិនអនុញ្ញាតឱ្យប្រទេសដ៏ទៃ លូកលាន់បញ្ហាផ្ទៃក្នុងនៃប្រទេសដ៏ទៃ ក៏នៅមានក្របខណ្ឌច្បាប់រំលោភសិទ្ធមនុស្សមនុស្សធ្ងន់ធ្ងរ ដែលផុសចេញពីការបង្ក្រាបរាស្ត្រហួសហេតុអាចត្រូវគេយកមកប្រើប្រាស់បានដែរ ។ មេដឹកនាំនយោបាយប្រឆាំងជាច្រើនបានបាត់បង់ការគាំទ្រនៅពេលមានវិបត្តិធ្ងន់ធ្ងរម្តងៗ

សម្តេចនរោត្តម សីហនុ បានលាចាកលោកនេះ ទៅហើយវីរៈភាពនិងកេរ្តិ៍បានព្សន្ទ៉សុសសាយដោយផ្សព្វផ្សាយពីប្រវត្តិយូរឆ្នាំនៅលើនយោបាយកម្ពុជា ។ មរតករបស់ព្រះអង្គគឺជាអំរែកដ៏ធ្ងន់ធ្ងរសម្រាប់ប្រជាជាតិថា ខ្មែរនិងក្លាយទៅជាអ្វី? មនុស្សជាច្រើនថា ខ្មែរនិងក្លាយទៅជាយួន! ចុះចិនទុកឱ្យ យួនមានក្រញ៉ាំនាគលើខ្មែរដែរ ឬទេ? តើ សហគមន៍អាស៊ានមើលការវិវត្តន៍កម្ពុជាថា ជា"អាណាចក្របែបថ្មី"ឬយ៉ាងណាទេ? មើលទៅ អ.ស.ប ហាក់ដូចជាបោះបង់កិច្ចព្រមព្រៀងក្រុងប៉ារីសឆ្នាំ៩១ សម្រាប់សន្តិភាពកម្ពុជារួចទៅហើយ បើគ្មានការរើបំរះពីប្រជាពលរដ្ឋខ្មែរទេនោះ ។ អម្រែកនៃមរតកព្រះអង្គដ៏ធ្ងន់ធ្ងរចំពោះព្រះមហាក្សត្រ សីហមុនី និងព្រះមាតាដែលគង់ប្រថាប់ក្បែរព្រះអង្គជាកម្លាំងចិត្ត តែពុំមាននរណាដឹងនៅឡើយថា ទំនាក់ទំនងថ្មីរបស់ព្រះបរមរាជវាំង និងមានរបៀបណាចំពោះវៀតណាមនោះ -គេក៏រឹតតែមិនដឹងថា នឹងនៅមានព្រះបរមរាជវាំងថ្មីនៅ "បេឃីង"និងនៅ"ព្យុងយ៉ាង"ជាបន្តទៀត ឬយ៉ាងណានោះនៅឡើយដែរ ៕


ភ្ញៀវទេសចរមកកម្សាន្ដនៅលើកោះទន្សាយ





# កោះទន្សាយ

## ធ្វើឲ្យភ្ញៀវទេសចរមិនអាចបំភ្លេចបាន

**កោះទន្សាយ ជាកោះមួយក្នុងចំណោមកោះទាំង១៣ផ្សេងទៀត នៅក្នុងដែនសមុទ្រខេត្តកែបនៃប្រទេសកម្ពុជាព្រះរាជាណាចក្រអច្ឆរិយៈ ។ បច្ចុប្បន្នសក្ដានុពលទេសចរណ៍របស់ទីរមណីយដ្ឋាននេះបាននឹងកំពុងជ្រួតជ្រាបយ៉ាងជ្រាលជ្រៅនៅក្នុងបេះដូងអ្នកស្នេហាវិស័យឧស្សាហកម្មគ្មានផ្សែងឱ្យនាំគ្នាអញ្ជើញទៅកម្សាន្តទីនោះកាន់តែច្រើនឡើងពីមួយរដូវកាលទៅមួយរដូវកាលមិនចេះស្ងប់ស្ងាត់គួរឱ្យកត់សម្គាល់ ។**

●●●កោះទន្សាយមានទីតាំងស្ថិតនៅប៉ែកអាគ្នេយ៍នៃក្រុងកែប និងមានចម្ងាយ៤,៥គីឡូម៉ែត្រពីទីក្រុង ដែលជារមណីយដ្ឋានអំណោយផលមកពីធម្មជាតិអាចនិយាយបានថាជាមុខព្រួញសេដ្ឋកិច្ចនៃទេសចរណ៍ដ៏ល្អប្រណីតប្រចាំទីក្រុងកែបទៀតផង ។ យោងតាមសម្ដីអ្នកស្រុកបានតំណាលត១ៗគ្នាឱ្យដឹងថា "ឈ្មោះកោះទន្សាយនេះក្លាយមកពីពាក្យរំសាយ ព្រោះនៅពេលដែលស្ដេចសាគររាជអស់សង្ឃឹមក្នុងការតស៊ូដោយមានការបែកបាក់ពលសេនា និងបក្សពួកខ្លួនអស់ច្រើន ព្រះអង្គក៏បានដឹកនាំអ្នកដែលនៅសេសសល់ឆ្លងសមុទ្រមកដល់កោះមួយនៅខាងមុខក្រុងកែប ហើយក៏បានធ្វើការរំសាយទ័ពនៅទីនោះតែម្ដង ។ ដោយការហៅត១ៗគ្នាពីជំនាន់មួយទៅមួយជំនាន់កោះរំសាយបានក្លាយទៅជាកោះអំសាយទៅជាកោះអន្សាយ លុះក្រោយមកក៏ក្លាយទៅជាកោះទន្សាយ រហូតមកដល់សព្វថ្ងៃនេះឯង" ។

បើតាមសម្ដីប្រធានសហគមន៍អេកូទេស-ចរណ៍កោះទន្សាយបានឱ្យដឹងថា សក្ដានុពលក្នុងតំបន់នេះញ៉ាំងឱ្យភ្ញៀវទេសចរជាតិ និងអន្តរជាតិចាប់អារម្មណ៍បំផុតនោះ គឺមានច្រើនអនេកហួសពីការបរិយាយ ។ ជាក់ស្ដែងនៅលើតំបន់ដែនកោះទន្សាយទាំងមូលមានឆ្នេរចំនួន២កន្លែងយ៉ាងធំទូលាយ និងមានជម្រាលវែងហើយមានល្បាក់រាក់ដែលគ្របដណ្ដប់ដោយគ្រាប់ខ្សាច់សក្បុសទឹកសមុទ្រថ្លាឆ្វង់ដូចកញ្ចក់ចាំងឆ្លុះដល់បាតសមុទ្រអាចឱ្យយើងមើលឃើញយ៉ាងច្បាស់នូវពពួកផ្កាថ្មគ្រប់ប្រភេទមានសម្រស់ស្រស់ស្អាតប្លែក១ៗពីគ្នា ។ រីឯខ្យល់អាកាសក៏បរិសុទ្ធបក់មកត្រសៀក១ៗ បង្កើតបានជាសំឡេងទឹករលកបោកប៉ះនឹងផ្ទាំងថ្មដែលដុះប៉ប្រះផ្ទៃទឹកគួរឱ្យចង់ចុះងូតប្រឡែងលេងជាមួយសត្វផ្សោតយ៉ាងត្រេកត្រអាល ។

ចំណែកផ្លូវដើរកម្សាន្តជុំវិញ កោះមានដើមរុក្ខជាតិស្រស់ត្រកាលផ្ដល់ម្លប់ត្រឈឹងត្រឈៃល្អមនឹងត្រជាក់ស្រួលអារម្មណ៍បំពេរដោយសំឡេងបក្សាបក្សីដែលហ្វូងសត្វទាំងនេះវារមែងហិចហើរមកក្បែរ១ច្រាំងនា វេលាថ្ងៃរៀបអស្ដង្គតដើម្បីឃ្លាំចាំចាប់ត្រីធ្វើជាចំណីទៀតផង ។ លើសពីនេះសហគមន៍ក៏មានបម្រើនូវសេវាម្ហូបអាហារតាមភោជនីយដ្ឋានផ្ទះសំណាក់ជាលក្ខណៈបឹងហ្គាឡូសម្រាប់ ទុកជួលឱ្យភ្ញៀវទេសចរក្នុងតម្លៃសមរម្យ និងមានទូកចម្លងភ្ញៀវពីដែនម្ខាងទៅកាន់ទីកោះដោយទូក១គ្រឿងជួលក្នុងតម្លៃ២០ដុល្លារ ។ ចំពោះការធ្វើដំណើរត្រូវចំណាយពេលប្រមាណជា៣៥នាទី (ពេលស្ងប់រលក) ឬ៤៥នាទី ទៅ១ម៉ោង (រលកធំ) ដែលបច្ចុប្បន្ន យើងសង្កេតឃើញថាលំហូរចូលនៃភ្ញៀវទេសចរក្នុងស្រុកមានកំណើនគួរឱ្យកត់សម្គាល់ផ្ទុយពីពេលមុនគឺមានតែភ្ញៀវបរទេសដែលមានការចាប់អារម្មណ៍ចូលមកកម្សាន្តទីរមណីយដ្ឋាន ដែលមានលក្ខណៈសម្បត្តិធម្មជាតិបែបនេះ ។

ការចងក្រងបង្កើតឱ្យមានជាសហគមន៍អេកូទេសចរណ៍នៅលើកោះទន្សាយនេះពិតជាធ្វើឱ្យប្រជាពលរដ្ឋដែលរស់នៅទីនេះមានជីវភាពធូរធារបានមួយកម្រិតទៀត បន្ថែមពីលើមុខរបរនេសាទសមុទ្រតូចតាច និងថែទាំចម្ការដូងបន្តិចបន្តួច ដោយសារតែមានភ្ញៀវទេសចរជាតិនិងអន្តរជាតិតែងមកកម្សាន្តនៅតាមបណ្ដោយឆ្នេរនេះយ៉ាងច្រើនកុះករ ។ សព្វថ្ងៃនេះមន្ត្រីពាក់ព័ន្ធទាំងអស់នៅក្នុងខេត្តកែបបានជំរុញឱ្យប្រជាពលរដ្ឋរស់នៅលើកោះ ត្រូវតែមានអនាម័យ សម្អាតបរិស្ថានដែនកោះឱ្យបានល្អនិងខិតខំកែលម្អសោភណភាពបន្ថែមដើម្បីទាក់ទាញនូវភ្ញៀវទេសចរជាតិ និងអន្តរជាតិឱ្យមកលំហែកាយកាន់តែច្រើនទៅតាមដែលអាចធ្វើបាន ។ កោះទន្សាយឥឡូវនេះមានចំនួនភ្ញៀវទេសចរកើនឡើងជាលំដាប់ ព្រោះថាភ្ញៀវទេសចរភាគច្រើនចូលចិត្តមកសម្រាកកាយនៅកន្លែងស្ងៀមស្ងាត់ ហើយគ្មានអ្វីមករំខានអារម្មណ៍ពីមជ្ឈដ្ឋានខាងក្រៅ ៕


ផ្ទះសំណាក់ទុកជួលឲ្យភ្ញៀវទេសចរសម្រាកលំហែកាយ

